សារព័ត៌មាន ខ្មែរប៉ុស្ដិ៍ ស.រ.អា
KhmerPost USA
Advertising: PA/NJ/NY: (267) 253-3947 MA/RI: (978) 656-8141

មាតិការឿង Vol 07 Issue 131-June 7th- 20th. 2013 ទំព័រ



32 Wamesit St., Lowell, MA 01852. Phone-Fax (978) 656 8141 www.khmerpost.us

# ទស្សនកិច្ចរយៈពេលខ្លីលើដីអាមេរិករបស់លោក កឹម សុខា




**ដោយៈ អ៊ុម សឿម**



អ៊ុម សឿម

ក្នុងខណៈដែលស្ថានការណ៍នយោបាយកម្ពុជាកំពុងតែពុះកញ្ជ្រោលនឹងកំពុងតែហែកហួរគ្នារវាងគណបក្សប្រជាជនកម្ពុជាដែលកំពុងក្ដោបក្ដាប់អំណាចជាង៣០ឆ្នាំហើយ ជាមួយនឹងគណបក្សសង្គ្រោះជាតិដែលទើបកើតថ្មី ស្រាប់តែលោក កឹម សុខា **តទៅទំព័រទី ១២**

# វ៉ាស្នា នួន ឈរឈ្មោះជាបេក្ខជន ក្រុមប្រឹក្សាក្រុងឡូវែលអាណត្តិថ្មី

**ដោយ : ពិន សំខុន**

លោក វ៉ាស្នា នួន បានប្រកាសបេក្ខភាពខ្លួនជាបេក្ខជនគណក្រុមប្រឹក្សាសាលាក្រុងឡូវែល កាលពីថ្ងៃព្រហស្បត្តិ៍ទី៦ ខែមិថុនា ឆ្នាំ២០១៣ នៅភោជនីយដ្ឋានកណ្ដាលក្រុងមួយដោយមានពលរដ្ឋសំខាន់ៗប្រមាណ១០០នាក់ចូលរួម ។ លោក រដ្ឋា យ៉ែម ប្រធានគណៈកម្មធិការឃោសនាឱ្យ វ៉ាស្នា នួន បានសម្ដែងការត្រេកអរចំពោះភ្ញៀវដ៏ច្រើនដែលអញ្ជើញមកគាំទ្របេក្ខជនខ្មែរអាមេរិកាំងរបស់ខ្លួន ហើយក៏សូមអញ្ជើញ **តទៅទំព័រទី ៥**




ព្រឹទ្ធសមាជិក មីគី សុងហ្គាស ទីប្រឹក្សាសាលាក្រុង វ៉ាស្នា នួន រដ្ឋា យ៉ែម

# វត្តត្រៃរតនារាមជម្លោះឆេះឡើងវិញមិនចេះចប់

ប្រជាពលរដ្ឋនៅឡូវែលរង់ចាំមើលស្នាដៃក្រុមថ្នាក់ដឹកនាំសហគមន៍ខ្មែរបង្រួបបង្រួមវត្តចាស់របស់ខ្លួន ប៉ុន្តែមានការដាក់ពាក្យបណ្ដឹងថ្មីទៀតរបស់វត្តលើចំពោះវត្តក្រោមដែលថា "វត្តក្រោមបានកាត់ភ្លើងអគ្គិសនីពីវត្តលើនៅពេលដែលត្រូវធ្វើបុណ្យសពជាបន្ទាន់មួយ" គឺជាជម្លោះបានឆេះឆ្លោរឡើងវិញគ្មានថ្ងៃបញ្ចប់បាន ។

កាលពីថ្មីៗនេះទៀត លោក អ៊ុង រិទ្ធី បានដឹកនាំបណ្ដឹង២ទៅដាក់តុលាការនៅឡូវែល និងនៅវូបឺន ប្ដឹងវត្តក្រោមថា **តទៅទំព័រទី ៥**

# កម្មវិធីពិសេសនារដូវក្ដៅឆ្នាំ២០១៣សម្រាប់កុមារ Boys and Girls Club

**ក្រុងឡូវែលៈ** សម្រាប់ឪពុកម្ដាយមាតាបិតាសិស្សដែលបំពេញការងារ និងរវល់ច្រើន ហើយមិនមានពេលវេលាផ្ដល់ការលំហែកំសាន្ដដល់កូនឱ្យបានគ្រប់គ្រាន់តែមានបំណងចង់ឱ្យកូនបានកំសាន្ដសប្បាយ ដូចគេដូចឯងនៅក្នុងរដូវក្ដៅនេះលោកអ្នកអាចធ្វើការទាក់ទងទៅកាន់មជ្ឈមណ្ឌល Boys and Girls Club (បយស៍អេនហ្គឺលក្លឹប) ដើម្បីចុះឈ្មោះឱ្យកូនចូលរួមកម្មវិធីរដូវក្ដៅនេះមានទីតាំងនៅ៦៥៧ Middlesex Street, Lowell, MA 01851-1410 និងលេខទូរស័ព្ទ 978-458-4526 ។

នៅ Boys and Girls Club (បយស៍អេនហ្គឺលក្លឹប) មានកម្មវិធីរដូវក្ដៅឱ្យឈ្មោះថា Boys and Girls Club Summer Program ។ កម្មវិធីនេះមានរយៈពេល ៨សប្ដាហ៍ ចាប់ពីថ្ងៃទី១ខែកក្កដា ដល់ថ្ងៃទី២៣ខែសីហា ឆ្នាំ២០១៣។ អាយុចូលរួមគឺចន្លោះពី៧ ទៅ១៨ឆ្នាំ។ ជាទូទៅកម្មវិធីចាប់ផ្ដើមពីម៉ោង៩ព្រឹកដល់ម៉ោង៥រសៀល ថ្លៃ $១៥ ក្នុងមួយអាទិត្យ ។ បើឪពុកម្ដាយយកកូនមកលឿនចាប់ពីម៉ោង៧:៣០នាទី ត្រូវបង់បន្ថែម២៥ដុល្លារពីលើ១៥ដុល្លានោះ មានន័យថាចំណាយ៤០ដុល្លារក្នុងមួយអាទិត្យ។ ហើយបើយកកូនមកលឿនផង និងល្ងាចឡើងមកយកកូនយឺតផងនោះត្រូវបង់បន្ថែម៥០ដុល្លារពីលើ១៥ដុល្លារនោះ មានន័យថា **តទៅទំព័រទី ១៣**



# អ្នកភូមិវត្តគរជីវភាពមិនស៊ីវិល័យតែ សម្បូរបែបនិងសណ្តាប់ធ្នាប់រស់នៅល្អ















**អត្ថបទដោយៈ សុខា**
**រូបភាពដោយៈ ហេង ស្រ៊ាងហួត**

**ភូមិវត្តគរខេត្តបាត់ដំបងៈ** ភូមិវត្តគរត្រូវបានប្រសិទ្ធនាមថា ជាភូមិវប្បធម៌ក្នុងអំឡុងឆ្នាំ ២000 ។ ឆ្លងកាត់ការយកចិត្តទុកដាក់ស្វែងយល់ពីជីវិតរស់នៅដ៏គួរឱ្យចាប់អារម្មណ៍របស់អ្នកភូមិវត្តគរក្នុងខេត្តបាត់ដំបងកាសែតខ្មែរប៉ុស្តិ៍សហរដ្ឋអាមេរិកសូមលើកយកនូវជ្រុងមួយនៃទិដ្ឋភាពដ៏ល្អប្រសើរពីមាតុប្រទេសដើម្បីឆ្លុះបញ្ចាំងពីតំបន់ដ៏កម្រ និងល្អពិសេសមួយនេះដល់សាធារណជនបានជ្រាប ។

ជារឿយៗពលរដ្ឋខ្មែរទាំងក្នុង និងក្រៅប្រទេសប្រទះនឹងព័ត៌មាន ឬហេតុការណ៍ដែលកើតឡើងជុំវិញតំបន់ និងរាជធានីក្នុងព្រះរាជាណាចក្រកម្ពុជាពាក់ព័ន្ធនឹងបញ្ហាដីធ្លីការងារជីវភាពរស់នៅខ្វះខាត និងបញ្ហាចោទផ្សេងៗទៀត ។ ប៉ុន្តែភូមិវត្តគរក្នុងស្រុកបាត់ដំបងខេត្តបាត់ដំបងនៃព្រះរាជាណាចក្រកម្ពុជាជាទីកន្លែងដែលផ្តល់ដល់សាធារណជននូវការរស់នៅរបស់អ្នកភូមិនេះជាទីស្ថានមួយគួរឱ្យចង់រស់នៅក្រៃលែង ។

ភូមិវត្តគរជាភូមិនៅមិនឆ្ងាយពីទីរួមខេត្ត ។ ដោយចំណាយពេលពី១០ទៅ១៥នាទីតាមរយៈយានជំនិះលើបណ្តោយផ្លូវស្របតាមស្ទឹងសង្កែជិតដល់ដីវត្តគរឡើងទួលបន្តិចកាត់ស្ពានដែកវត្តគរទីដែលរថភ្លើង និងនរីបើកឆ្លងកាត់ហើយងាកឱ្យចំផ្លាកសញ្ញាដាក់ថា ភូមិវត្តគរសូមស្វាគន៍ (Welcome to Wat Kor Village) នោះហើយគឺជាភូមិវត្តគរដែលជុំវិញដោយវត្តចំនួនបីនៅផ្នែកម្ខាងរួមមានវត្តកណ្តឹងវត្តគរនិងវត្តកំពង់សីម៉ាព្រមទាំងវត្តតាមឹមនៅត្រើយម្ខាង ។ វត្តអារាមជាទីទ្រទ្រង់នូវព្រះពុទ្ធសាសនាហើយផ្តល់ដល់អ្នកភូមិវត្តគរនូវការប្រតិបត្តិតាមលំអានព្រះពុទ្ធសាសនាការទៅ **តទៅទំព័រទី ១០**

# វិស័យលក់ទិញផ្ទះកំពុងរីកចំរើនយ៉ាងរឹងមាំ


Richard Howe

យើងចេះតែមានអារម្មណ៍ថា វិស័យទិញ និងលក់ផ្ទះនៅតាំងដំណើរតាំងពី១០ឆ្នាំមកហើយ មិនអាចងើបរួចឆាប់ៗនោះទេ តែលោក រីក ឆឹតហាវ ជាអ្នកគ្រប់គ្រងនៅ"Registry of Deeds នៅឡូវែល" បាននិយាយផ្ទុយថា "ស្ថានភាពយ៉ាប់យ៉ឺននោះបានផ្លាស់ប្តូរហើយ" ការកាត់ឈ្មោះកម្មសិទ្ធ កាលពី៥ខែដំបូងនៃឆ្នាំ២០១២មាន៥៧៥ តែ៥ខែដំបូងនៃឆ្នាំ២០១៣មានដល់ទៅ៧១៥ឯណោះ គឺបានកើនឡើង២៤% ។ ចំណែកឯការរឹបអូសយកផ្ទះនា៥ខែដំបូងឆ្នាំ២០១២មាន៨៨ករណី ហើយក្នុងរយៈពេលដដែលនៃឆ្នាំ២០១៣មានតែ៣៣ករណីទេ ដូច្នេះគឺចុះ៦៣% ។

សូមអញ្ជើញអានអត្ថបទ រីក ឆឹតហាវ ជាភាសាអង់គ្លេសផ្តល់ហេតុផលឱ្យវិស័យទិញ និងលក់ផ្ទះនៅឡូវែលកំពុងផ្តើមរឹងប៉ឹងគួរឱ្យជឿបានមកវិញហើយ ។




**Lowell Real Estate Growing Stronger (June 4, 2013 by Richard Howe)**

The real estate market in Lowell is beginning to improve. The number of deeds recorded rose from 575 in the first five months of 2012 to 715 in the first five months of 2013, an increase of 24%. There was a similar increase in mortgages which jumped 28%, going from 1018 to 1301. There was also a major drop in foreclosures. From January to May of 2012, there were 88 foreclosure deeds recorded. In the same period in 2013 there were only 33 which is a drop of 63%.

Despite these positive statistics, the recovery of the real estate market has been very slow. During April of 2013, there were 78 homes sold in Lowell. The sellers of 28 of these homes had owned the property for more than 20 years which means their mortgages were either paid off or nearly paid off. In 17 other cases, the seller was a bank that had become the owner by foreclosing on a mortgage on the property. In the rest of the cases, the seller had owned the property for less than 20 years and in most cases for less than 10 years.

Many of the sellers who had owned the property for less than 10 years owed more on their mortgages than they received from selling the property. This is known as being "underwater" and it usually prevents the sale from occurring since the seller uses the money received in the sale to pay off the mortgage. If there is not enough money to pay off the mortgage, the sale usually does not happen. Recently, however, lenders seem willing to take less than the full amount owed on the mortgage when a borrower wants to sell the property. This is known as a "short sale." Even though the lender gets less than the full amount owed, it is still more money than it would receive by foreclosing on the property so sometimes this is the best option for both lenders and borrowers.




Looking at the median sales price of homes in Lowell helps show why this problem exists. In 2002, there were 1646 sales in Lowell with a median price of $185,000. In 2005, there were 2237 sales with a median price of $254,000. In 2011 there were only 983 sales and they had a median price of $165,000. There were the same number of sales in 2012 but the median price had increased to $170,000. While that is only a slight increase, it is going in the right direction. Until prices increase to levels close to what they were during the real estate boom, people who bought homes during the boom (2003 to 2007) will continue to have difficulty selling or refinancing their homes.

To obtain more information about real estate in Lowell and Greater Lowell, visit the website of the Middlesex North Registry of Deeds which is www.lowelldeeds.com. The "Sales and Foreclosure Report" on that site lists every sale in Lowell since 2000 shown year-by-year.

# ខ្មែរអ្នកជាតិនិយម

ពីលេខមុន

ប្រលងប្រជែង ព្រោះថ្នាក់រៀនមានចំនួនសិស្សតិចបំផុត ។ ដូច្នេះព្រះសង្ឃដែលមានភព្វសំណាងបានចូលរៀនសាលាបាលីជាន់ខ្ពស់នេះ ក៏មានចំនួនតិចបំផុតដែរ ។ ឯព្រះសង្ឃដែលអភ័ព្វខ្វះវិជ្ជាជាន់ខ្ពស់វិញ ក៏មានចំនួនច្រើនលើសលប់ក្នុងផ្ទៃប្រទេសទាំងមូល ។ ប៉ុន្តែសិស្សសាលាវត្តក្តី អ្នកធ្លាប់បួសក្តី ដែលពុំមានវាសនាទៅក្រេបជញ្ជក់យកចំណេះផ្លូវលោក ឬដែលខ្វមធ្យោបាយធ្វើខ្លួនឱ្យទៅជាអ្នកមានស្តុកស្តម្ភ ឬជាអ្នកកាន់អំណាច ដូចពួកសិស្សសាលារាជការនោះ ក៏ពុំសូវមានការប្រណាំងប្រជែងគ្នាក្នុងសង្គមខ្មែរដែរ ។ ម្ល៉ោះហើយ ពួកនេះតែងមានមនោសញ្ចេតនាស្នេហាជាតិត្រឹមត្រូវច្បាស់លាស់ជាងពួកអ្នកចេញពីសលារាជការ ។ ត្រង់នេះហើយ បានជានៅក្នុងសាវតាខ្មែរ គេសង្កេតឃើញសិស្សសាលាវត្តរមែងមានមនសិការជាតិខ្ពស់ បានចេញមុខធ្វើការបដិវត្តន៍បះបោរប្រឆាំងពួកអ្នកជិះជាន់ជាតិជានិច្ច មានជាអាទិ៍ គឺលោក អាចារ្យ ស្វា លោកគ្រូ អាចារ្យ ហែម ចៀវ លោក នួន ដួង ។ល។ ដែលសុទ្ធតែហ៊ានចេញមុខប្តូរជីវិតក្នុងកាប្រឆាំង និងការត្រួតត្រាជិះជាន់នៃរបបអាណានិគមនិយមបារាំង រហូតអស់សង្ខារវៀងខ្លួន ។



និពន្ធដោយ ឡឹក សំអឿន ហៅ "ផ្កាយព្រឹក"

ក្នុងរជ្ជកាលព្រះបាទ ស៊ីសុវត្ថិ មានព្រឹត្តិការណ៍ ២ ក្នុងលោកបានកើតឡើងគឺ ជ័យជំនះជប៉ុនក្នុងសង្គ្រាមជាមួយរុស្សីក្នុងឆ្នាំ ១៩០៤-១៩០៥ និងជ័យជំនះនៃបដិវត្តន៍ចិន ដឹកនាំដោយលោក ស៊ុន យ៉ាត់សេន ក្នុងឆ្នាំ១៩១១ ។ ព្រឹត្តិការណ៍ទាំងពីរនេះ បានទាក់ទាញអ្នកចេះដឹងយួនឱ្យធ្វើប្រតិកម្មយ៉ាងរហ័សដោយមានពួកអ្នកអក្សរសាស្ត្រយួនមួយក្រុមដឹកនាំដោយ ដាំ ប៊ុយចូវ បានធ្វើដំណើរទៅដល់ប្រទេសជប៉ុនដើម្បីចាប់ផ្តើមបំបះបំបោរបណ្តាជនយួនពីទីនោះ ចាប់តាំងពីឆ្នាំ១៩១២ ជាឆ្នាំដែលគណៈបក្សគួមិញតាំងនៃចិនជាតិនិយមបានកើតឡើង ។ ពេលនោះប្រទេសចិនបានទៅជាជម្រកមួយដ៏សំខាន់របស់អ្នកជាតិនិយមយួន ។

កាលពីសង្គ្រាមលោកលើកទី១ (គ.ស ១៩១៤-១៩១៨) ចម្បាំងដែលអង់គ្លេស.បារាំង. រុស្សី.បែលហ្ស៊ិក.អ៊ីតាលី. ជប៉ុន.សហរដ្ឋអាមេរិក និងសម្ព័ន្ធមិត្តដ៏ទៃទៀតយកជ័យជំនះលើអាល្លឺម៉ង់ដ៏.អូទ្រីស.ហុងហ្គារី.ទួរគី. និងប៊ុហ្គារី) ។ បារាំងបានបញ្ជូនទាហាននៃប្រទេសទាំង៣ នៅឥណ្ឌូចិន ឱ្យទៅចូលរួមក្នុងសង្គ្រាមនោះនៅអឺរ៉ុប ។ គឺពួកពលទាហានទាំងនោះហើយ ដែលនៅពេលត្រឡប់មកមាតុភូមិវិញ បាននាំមកនូវគំនិតថ្មីៗ ដែលខ្លួនបានជួបប្រទះកាលនៅអឺរ៉ុប ។ ជាពិសេសនៅប្រទេសយួនគ្រានោះហើយ ដែលគេឃើញមានគណៈបក្សនយោបាយទាំងនោះឯង ដែលជាស្នូលនៃគំនិតទាមទារយកឯករាជ្យ ប្រឆាំងនិងការត្រួតត្រារបស់អាណានិគមនិយមបារាំង ។

ចំណែកឯនៅកម្ពុជាវិញ គ្មានប្រតិកម្មអ្វីកើតឡើងសោះ រហូតដល់រាជ្យមុនីវង្សហើយ ក៏នៅតែមានសភាពស្ងប់ស្ងាត់ជាទីបំផុត គឺឥតមានរំជើបរំជួលប្រឆាំងនឹងបារាំងសោះឡើយ ។ នៅសម័យសង្គ្រាមលោកលើកទី១នេះឯង ជនជាតិបារាំងដែលត្រូវបញ្ជូនមកធ្វើការនៅឥណ្ឌូចិនបានត្រូវបន្ថយចំនួនយ៉ាងច្រើន ។ ដូច្នេះរដ្ឋការអាណានិគមនិយមបារាំងក៏ជ្រើសអ្នកធ្វើការក្នុងចំណោមជនជាតិទាំង៣នៅឥណ្ឌូចិន ។ គេបានបង្កើតសាលាច្បាប់ និងរដ្ឋបាល ក្នុងគោលដៅបង្ហាត់ហ្វឹកហ្វឺនអ្នករាជការខ្មែរណាដែលមានមុខងារជាស្មៀនរ៉េស៊ីដង់ត៍ (ថីរ៉េស៊ីដង់ត៍) ហើយជ្រើសរើសយកតែអ្នកដែលមានមធ្យមសិក្សាប័ត្រ (ឌីប្លូម) តែប៉ុណ្ណោះ ។ សាលាច្បាប់ និងរដ្ឋបាលនេះហើយ ដែលបានបង្កើតវរជននយោបាយជាលើកដំបូងនៅប្រទេសខ្មែរ ហើយភាគច្រើននៃអតីតអ្នកដឹកនាំខ្មែរយើងច្រើនតែបានចេញពីសាលានេះ ។

នៅពេលព្រះករុណា មុនីវង្ស សុគត នៅថ្ងៃទី២៣ មេសា ១៩៤១ប្រទេសកម្ពុជាបានបាត់បង់ម្តងទៀត នូវខេត្តបាត់ដំបង ស្រីសោភ័ណ និងមួយភាគធំនៃខេត្តសៀមរាប កំពង់ធំ និងស្ទឹងត្រែង ដែលបានរាំងឱ្យទៅសៀម ។

ក្រោយជ័យជំនះលើសង្គ្រាមជាមួយរុស្សីក្នុងឆ្នាំ១៩០៥ ប្រទេសជប៉ុនវាយយកបានប្រទេសម៉ាន់ជូរី (Manchuria) ទាំងមូលក្រោយមកទៀត បានកាន់កាប់ស្រុកយេហ៊ូល ខេត្តចិន ដែលជាច្រកទ្វារចេញចូលប្រទេសម៉ុងហ្គោលី ។ ក្នុងពេលដែលចិនជាតិនិយម និងចិនកុម្មុយនីស្តកំពុងវាយប្រហារគ្នាឯងនោះ ជប៉ុនបានឆ្លៀតឱកាសវាយលុកប្រទេសចិន **តទៅលេខក្រោយ**

# ១៨ មិនា ១៩៦៩ ជាដើមចមនៃវិបត្តិសុខភាពរបស់ពលរដ្ឋខ្មែរអាមេរិកាំង

**ដោយៈ គង់ សេងលី**



សេងលី គួង

ថ្ងៃទី ១៨ ខែ មិនា ឆ្នាំ ២០១៣ ជាខួបទី៤៤ឆ្នាំនៃការចាប់ផ្តើមទម្លាក់គ្រាប់បែកនៅក្នុងប្រទេសកម្ពុជា ដោយបានលាក់បាំងពីពលរដ្ឋអាមេរិកាំងទូទៅក្នុងប្រតិបត្តិការណ៍មួយដែលលោកប្រធានាធិបតី Nixon នៅក្នុងអង្គប្រជុំក្រុមប្រឹក្សាសន្តិសុខជាតិនៅសេតវិមាននាថ្ងៃទី១៥ ខែមិនា ឆ្នាំ ១៩៦៩ ឱ្យឈ្មោះថា "ប្រតិបត្តិការណ៍ស្រស់ស្រូបពេលព្រឹក"ហើយឱ្យឈ្មោះការទម្លាក់គ្រាប់បែកថា "Menu ឬបញ្ជីមុខម្ហូប" ថ្ងៃទី១៨ ខែមិនា ក៏ជាខួបទី៤៣ ឆ្នាំនៃការធ្វើរដ្ឋប្រហាររបស់ឧត្តមសេនីយ៍ លន់ នល់ នៅថ្ងៃទី១៨ ខែមិនា ឆ្នាំ១៩៧០ ដោយមានការគាំទ្រពីរដ្ឋាភិបាលសហរដ្ឋអាមេរិក ទម្លាក់សម្តេចព្រះនរោត្តម សីហនុ ពីប្រមុខរដ្ឋសង្គមរាស្ត្រនិយមបង្កើតរបបសាធារណៈរដ្ឋខ្មែររុញច្រានប្រទេសកម្ពុជាឱ្យចូលពេញទំហឹងទៅក្នុងភ្នក់ភ្លើងសង្គ្រាមនៅក្នុងតំបន់ គឺសង្គ្រាមវៀតណាម (១៩៧០-១៩៧៥) ផ្តល់កំណើតដល់របបវាលពិឃាតប្រល័យពូជសាសន៍ ប៉ុល ពត (១៩៧៥-១៩៧៩) បង្កឱ្យមានសង្គ្រាមស៊ីវិលជិត២ទសវត្ស (១៩៧៥-១៩៩៣) ធ្វើឱ្យមនុស្សរាប់សែននាក់ភៀសខ្លួនទៅរស់នៅជំរុំតាមព្រំដែនកម្ពុជា-ថៃ និងធ្វើឱ្យកម្ពុជាជំពាក់បំណុលរដ្ឋាភិបាលអាមេរិកទាំងដើមទាំងការប្រាក់ចំនួនជាង $445 លានដុល្លារ ។

**រូបទី១:** គ្រាប់បែកណាប៉ាល់ (Napalm) ដែលទម្លាក់នៅស្រុកខ្មែរ តាមឯកសារដែលបានចេញឱ្យដឹងជាសាធារណៈដោយរដ្ឋបាលលោកប្រធានាធិបតី Clinton ក្នុងឆ្នាំ២000 បានបង្ហាញថា ការទម្លាក់គ្រាប់បែកលើប្រទេស និងប្រជាជនកម្ពុជាមានប្រមាណ២.៧លានតោន គឺច្រើនជាងចំនួនគ្រាប់បែកទាំងអស់ដែលទម្លាក់នៅក្នុងសង្គ្រាមលោកលើកទី២ រួមទាំងគ្រាប់បែកបរិមាណូ២គ្រាប់ដែលទម្លាក់នៅប្រទេសជប៉ុនផងដែរ ។ លោក Henry Kissinger ដែលកាលនោះជារដ្ឋមន្ត្រីក្រសួងការបរទេសបានបញ្ជាឱ្យយន្តហោះអាមេរិកទម្លាក់គ្រាប់បែកកំទេចចោលនូវ"អ្វីៗដែលហោះហើរ និងអ្វីៗដែលមានចលនា"។ ជាផលវិបាកប្រតិបត្តិការណ៍ "ស្រស់ស្រូបពេលព្រឹក" នេះបានបណ្តាលឱ្យប្រជាជនកម្ពុជាស្លាប់យ៉ាងហោចណាស់៥00.000នាក់ ពិការរាប់សែននាក់ និងប្រជាជនរាប់លាននាក់ទៀតត្រូវបាក់ស្បាតស្មារតី ឬមានវិបត្តិផ្លូវចិត្តរហូតមកទល់សព្វថ្ងៃនេះ ។



រូបទី១: គ្រាប់បែកណាប៉ាល់ (Napalm) ដែលទម្លាក់នៅស្រុកខ្មែរ

ប្រតិបត្តិការណ៍ "ស្រស់ស្រូបពេលព្រឹក" ក៏បានកំទេចចោលនូវប្រព័ន្ធហេដ្ឋារចនាសម្ព័ន្ធសេដ្ឋកិច្ច និងសង្គមកិច្ចកម្ពុជា ។ ជាពិសេសប្រតិបត្តិការនេះ បានរំខានយ៉ាងធ្ងន់ធ្ងរដល់ជីវភាពរស់នៅរបស់កសិករដែលមានប្រមាណជាង៨០% (នៃពលរដ្ឋខ្មែរសរុប) ដែលរស់នៅតំបន់ជនបទប្រកបរបរកសិកម្មដើម្បីចិញ្ចឹមជីវិតបានបំផ្លាញ់ ផលស្រូវ និងផលដំណាំរាប់លានហិចតា បានធ្វើឱ្យពលរដ្ឋរាប់លាននាក់អត់ឃ្លានរាប់លាននាក់ទៀតជួបប្រទះជំងឺគ្រប់ប្រភេទរាប់សែននាក់ស្លាប់ដោយអត់អាហារដោយជំងឺដែលគ្មានគ្រូពេទ្យព្យាបាល និងស្លាប់ដោយការទម្លាក់គ្រាប់បែក ។ មិនតែប៉ុណ្ណោះពួកខ្មែរក្រហមតែងតែជម្លៀសប្រជាជនពីកន្លែងមួយទៅកន្លែងទៀតដោយយកលេសថា ខ្លាចអាមេរិកាំងទម្លាក់គ្រាប់បែក ។ ពួកនេះមានចេតនាយកពលរដ្ឋជម្លៀសធ្វើជាខែលនយោបាយក្នុងការចោទប្រកាន់រដ្ឋាភិបាល លន់ នល់ ចំពោះការស្លាប់ជនស្លូតត្រង់ដោយការទម្លាក់គ្រាប់បែក។ ការលក់សព្វាវុធ និងពស្តុភាយោធាដល់រដ្ឋាភិបាលលោកសេនាប្រមុខ លន់ នល់ បានធ្វើឱ្យប្រជាជនកម្ពុជាជំពាក់បំណុលរដ្ឋាភិបាលអាមេរិកជាង $៤៤៥ លានដុល្លារបូករួមទាំងដើមទាំងការប្រាក់ក្នុងរយៈពេលជាង៤០ឆ្នាំមកនេះ ។

ដោយសាភាពអត់ឃ្លានកំហឹង និងការបែកបាក់គ្រួសាសាច់ញាតិ និងការបាត់បង់លំនៅដ្ឋានដោយសាយុទ្ធនាការស្រស់ស្រូបពេលព្រឹកនេះ យុវជនភាគច្រើន **តទៅទំព័រទី ១៨**

## តមកពីទំព័រទី ១ វ៉ាស្នា នួន ឈរឈ្មោះជាបេក្ខជន...

មកចូលរួមជាកម្លាំងវិភាគទាន ដើម្បីឱ្យការឃោសនាមានទំហឹងមាំបាន ។

ឱកាសសម្ពោធយុទ្ធនាការឃោសនានេះ មានតំណាងរាស្ត្រ និងតំណាងរដ្ឋាភិបាលច្រើនរូបចូលរួមសម្តែងការរីករាយដោយឃើញ វ៉ាស្នា នួន មានបំណងបន្តតំណែងដែលគេយល់ថា បានបំពេញតួនាទីបានយ៉ាងប្រសើរ ។ ប៉ាទ្រីក ម័រហ្វី ចៅហ្វាយក្រុងនិយាយថា "វ៉ាស្នា នួន ធ្វើបានទីលានកីឡាមួយដែលនេះមិនមែនគ្រាន់តែជាកីឡាដ្ឋានទេ តែជាទំនាក់ទំនងថ្មីរវាងពលរដ្ឋ និងរដ្ឋាភិបាល..." ចំណែក នីគីសុង គ្លាស សមាជិកព្រឹទ្ធសភា ស.រ.អា បន្តនាឱកាសដដែលនោះថា "អ្នកធ្វើការនៅវ៉ាស៊ីនតុនធ្វើការពុំមានប្រសិទ្ធភាពឆាប់រហ័ស ដូចអ្នកធ្វើការក្នុងតំបន់ទេ ក្រុមប្រឹក្សាក្រុង គេសម្រេចភ្លាម ធ្វើការឃើញលទ្ធផលភ្លាមខ្ញុំគ្មានអ្វីសប្បាយចិត្ត និងសួនឧទ្យានកីឡាមានសកម្មភាពច្រើនមានកន្លែងលក់ម្ហូបអាហារដូចជា "កូឡាបក្រហម" វ៉ាស្នា នួន គឺជាសមាជិកក្រុមប្រឹក្សាដ៏ល្អដែលគិតពីអនាគតគិតពីយុវជនគិតពីសន្តិសុខពលរដ្ឋ..." វ៉ាស្នា នួន បានថ្លែងបញ្ចប់ថា "ខ្ញុំបានចាប់ផ្តើមការងារ ដើម្បីសាមគ្គីភាព ដើម្បីចំរុងចំរើនដើម្បីសន្តិសុខតាមសាលា ឬតាមផ្លូវមិនសម្រាប់តែខ្មែរទេ គឺសំរាប់សហគមន៍អាស៊ានទាំងមូល... ដូច្នេះនៅមានការងារច្រើនទៀត ដែលត្រូវធ្វើ... ហេតុនេះហើយបានជាខ្ញុំសុំឱ្យអ្នកទាំងអស់គ្នាគាំទ្រខ្ញុំក្នុងការបោះឆ្នោតនៅថ្ងៃទី៥ ខែវិច្ឆិកា ខាងមុខ... ទី៥ ខែ វិច្ឆិកា ២០១៣"៕



អបអរសាទរ និង វ៉ាស្នា នួន ឈរឈ្មោះសារជាថ្មី

## តមកពីទំព័រទី ១ វត្តត្រៃរតនារាមជំលោះឆេះឡើង...

"បានកាត់ផ្តាច់គ្រាមានអាសន្នមិនឱ្យវត្តលើអាចប្រើអគ្គិសនីម៉ាស៊ីនកំដៅពេលបុណ្យសពមួយបាន" តែតុលាការទាំង២កន្លែង"មិនបានទទួលបណ្តឹង និងមិនមានបញ្ជាឱ្យបើកភ្លើងអោយវត្តលើ"ក៏ទេដែរ ពីព្រោះគ្មាន "ភាពអាសន្នដូចពាក្យបណ្តឹង ហើយម៉ាស៊ីនដែលផ្តល់កំដៅនោះវាខូចជាច្រើនខែមកហើយ" ដែលវត្តក្រោមនិយាយថា "វត្តលើត្រូវជួសជុលដោយធន់ធានខ្លួនឯង" ឯវត្តលើបន្ទោសថា "ពុំមានសហការណ៍ពីវត្តក្រោមមិនអាចចូលទៅជួសជុលបានទេ"។ ការប្តឹងប្តល់គ្នានេះបានផ្តាច់សេចក្តីសង្ឃឹមថា នឹងមានការច្របាច់បញ្ចូលវត្តទាំងពីរនេះ បាននាពេលឆាប់ៗបានមិនដូចដែលសម្តីក្រុមអ្នកដឹកនាំទាំងនោះបាននិយាយ កាលពីខែមុនឱ្យតែពីរោះស្តាប់ទេ ។ សម្តីពីរោះទាំងនោះ បានធ្វើឱ្យវត្តលើ និងវត្តក្រោមចំណាយប្រាក់សប្បុរសធមិរបស់ពុទ្ធបរិស័ទចំណុះជើងវត្តចំនួនប្រមាណ ១៤ម៉ឺននម្នាក់ទៅជួលមេធាវីសម្រាប់ការពារក្តីរៀងៗខ្លួន តាំងតែពីជាង១០ឆ្នាំមកហើយ ។ ចំណែកឯចំណាយទឹកភ្លើងវត្តលើមិនមានចំណាយទេ វត្តក្រោមនិយាយថា "ខ្លួនជាអ្នកចេញចំណាយទាំងក្រោមទាំងលើតាំងពីដើមជម្លោះជាងដប់ឆ្នាំហើយ" ។ នេះគេហៅថា "ឆ្លាត"តែមិនបានហៅថា "សុច្ចរិត" ទេ ដូច្នេះមិនងាយ និងរួបរួមគ្នាបានទេ៕



លោក រិទ្ធី អ៊ុង

**ខ្មែរផុស ស.រ.អា**

ឌឹ ខេមបូឌា ដេលី The Cambodia Daily

ដំណឹងប្រែសម្រួលពីកាសារអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃ ព្រហស្បតិ៍ ទី០៦ ខែមិថុនា ឆ្នាំ២០១៣

## មន្ត្រីថៃ : ការហាមលោក សម រង្ស៊ី មិនឱ្យចូលប្រទេសថៃ គឺដើម្បីការពារសកម្មភាពនយោបាយ

Lauren Crothers

**ខេមបូឌា ដេលី**

កាលពីព្រឹកមិញលោក សម រង្ស៊ី មេដឹកនាំគណបក្សប្រឆាំងដែលនិរទេសខ្លួនឯងនោះបានបន្តផ្សព្វផ្សាយសៀវភៅថ្មីមួយក្បាលរបស់លោកក្នុងប្រទេសថៃ ទោះបីជាមានការផ្សព្វផ្សាយតាមវីដេអូខុនហ្វើរិនក៏ដោយ បន្ទាប់ពីលោកត្រូវបានបដិសេធមិនចូលក្នុងប្រទេសនេះកាលពីថ្ងៃអង្គារនោះ ។

លោក ម៉ាណាស្វី ស្រ៊ីសូដាប៉ុល (Manasvi Srisodapol) អ្នកនាំពាក្យក្រសួងការបរទេសថៃបានមានប្រសាសន៍ថា ការសម្រេចហាមមិនឱ្យលោក សម រង្ស៊ី ចូលក្នុងប្រទេសនេះ គឺធ្វើឡើងដើម្បីបញ្ឈប់រូបគាត់មិនឱ្យប្រើប្រាស់ប្រទេសថៃជាមូលដ្ឋានសម្រាប់ធ្វើសកម្មភាពនយោបាយ ។

លោក ម៉ាណាស្វី បានមានប្រសាសន៍ថា "ពាក់ព័ន្ធនឹងបញ្ហានេះ យើងបានរក្សាទំនាក់ទំនងជិតស្និទ្ធជាមួយលោក សម រង្ស៊ី មួយរយៈពេល ដែរ ដើម្បីណែនាំគាត់ឱ្យពន្យាពេលទស្សនកិច្ចរបស់គាត់មកកាន់ប្រទេសថៃរហូតដល់ការបោះឆ្នោតចប់រួចរាល់ ព្រោះកាលពីមុនគេបានឱ្យដឹងថាគាត់បានប្រើប្រាស់ឱកាសនៃការធ្វើទស្សនកិច្ចរបស់គាត់ ដើម្បីធ្វើសកម្មភាពនយោបាយប្រឆាំងនឹងរដ្ឋាភិបាលកម្ពុជា ហើយប្រទេសថៃមានគោលនយោបាយជាយូរមកហើយមិនអនុញ្ញាតិឱ្យភាគីទី៣ ប្រើប្រាស់ប្រទេសខ្លួន ដើម្បីធ្វើសកម្មភាពនយោបាយដែលអាចប៉ះពាល់ដល់ស្ថិរភាពនយោបាយរបស់ប្រទេសមួយផ្សេងនោះទេ ជាពិសេសគឺប្រទេសជាសមាជិកអាស៊ានតែម្តង" ។

នៅពេលសួរថា តើមន្ត្រីនៅក្នុងប្រទេសកម្ពុជាបានទាក់ទងរដ្ឋាភិបាលថៃពីគម្រោងទស្សនកិច្ចរបស់លោក សម រង្ស៊ី មកកាន់ប្រទេសនេះដែរឬអត់នោះ លោកបានមានប្រសាសន៍បន្ថែមថា "នេះជាការសម្រេចចិត្តរបស់អាជ្ញាធរថៃ" ។

ហើយនៅពេលសួរថា តើគេនឹងអនុញ្ញាតឱ្យធ្វើវីដេអូខុនហ្វើរិនបន្តទៀត ឬអត់នោះលោក ម៉ាណាស្វី បានមានប្រសាសន៍ថា វាអាស្រ័យលើអ្នករៀបចំ ហើយពួកគេពិតជាយល់អំពីគោលនយោបាយរបស់ប្រទេសថៃក្នុងបញ្ហានេះ" ។

មានប្រសាសន៍តាមទូរស័ព្ទពីប្រទេសសិង្ហបុរី មុនពេលធ្វើវីដេអូខុនហ្វើរិន លោក សម រង្ស៊ី ដែលត្រូវហាមមិនឱ្យ **តទៅទំព័រទី១៣**

## Thailand Says Rainsy Banned Entry to Prevent 'Political Activities'

**By LAUREN CROTHERS**
**THE CAMBODIA Daily**

Self-exiled opposition leader Sam Rainsy yesterday went ahead with the launch of his new book in Thailand-albeit via videoconference-after he was refused entry into the country on Tuesday.

Thai Foreign Ministry spokesman Manasvi Srisodapol said the decision to ban Mr. Rainsy was made in order to stop him from using Thailand as a base to conduct his political activities.

"On this pu1irular matter, we have been in close touch with Mr. Sam Rainsy for quite some time to advise him to postpone his visit to Thailand until after the elections, because in the past, he has been known to use opportunities with his visits to manipulate political activities against the government of Cambodia, and Thailand has a longstanding policy not to allow Thailand to be used by a third party to undertake political activities that would destabilize another court try-in this case, an Asean member state," Mr. Manasvi said.

"This is a decision based on the Thai authorities themselves," he added when asked if officials in Cambodia had contacted the Thai government about Mr. Rainsy's planned visit to Thailand.

Asked if the videoconference would be allowed to go ahead, Mr. Manasvi said: 'That is up to the organizers, and they fully understand Thailand's policies in this regard".

Speaking by telephone from Singapore ahead of the videoconference, Mr. Rainsy, who has been banned from running in July's national election due to his convictions on charges of incitement and the destruction of public property, said he had been due to speak at the Foreign Correspondents' Club of Thailand to launch his book, 'We Didn't Start the Fire: My Struggle for Democracy in Cambodia."

"I think the fact is that Hun Sen is very afraid of the Cambodia National Rescue Party and he must have begged the Thai authorities to prevent me from moving too close to Cambodia," Mr. Rainsy said.

Interior Ministry spokesman Lieutenant General Khieu Sopheak said he had no information about Mr. Rainsy's refusal of entry into Thailand.

(Additional reporting by Phorn Bopha)

## នៅទិវាបរិស្ថានពិភពលោកក្រុមអ្នកតវ៉ាបានអំពាវនាវ ឱ្យជួយថែរក្សាព្រៃឈើនៅកម្ពុជា

**ឃួន ណារីម**

**ខេមបូឌា ដេលី**

ប្រជាពលរដ្ឋប្រហែលជា២០០នាក់ដែលចូលរួមប្រារព្ធទិវាបរិស្ថានពិភពលោកបានប្រមូលផ្តុំគ្នាកាលពីម្សិលមិញនៅមុខរដ្ឋសភាដើម្បីប្រគល់ញត្តិមួយស្នើសុំឱ្យរដ្ឋាភិបាលបញ្ឈប់ការកាប់បំផ្លាញព្រៃឈើរបស់ប្រទេសកម្ពុជា ។

ដោយពាក់របាំងមុខរូបគោ ឆ្មាព្រៃ និងសត្វទីទុយ សមាជិកសហគមន៍ព្រៃឈើមួយក្រុម និងអ្នកការពារបរិស្ថានជាច្រើននាក់បានចោទរដ្ឋាភិបាលថា មិនយកចិត្តទុកដាក់ចំពោះព្រៃឈើដោយការផ្តល់សម្បទានសេដ្ឋកិច្ចទៅឱ្យក្រុមហ៊ុនដែលពាក់ព័ន្ធទៅ នឹងការកាប់ឈើខុសច្បាប់ ។

លោក ថេង សាវឿន អ្នកសម្របសម្រួលរបស់សហគមន៍កសិករកម្ពុជា មានប្រសាសន៍ដល់ឧកញ៉ាថា "កាលពីពេលមុនប្រជាពលរដ្ឋចូលទៅក្នុងព្រៃខ្លាចសត្វខ្លា ប៉ុន្តែនៅពេលនេះពួកគាត់ចូលព្រៃខ្លាចឧកញ៉ាទៅវិញ និងខ្លាចក្រុមហ៊ុនរបស់ពួកគេវាយធ្វើបាបពួកគាត់" ។

របាយការណ៍មួយដែលចេញផ្សាយដោយអង្គការស្បៀងអាហារពិភពលោកបានឱ្យដឹងថាប្រទេសកម្ពុជា បានបាត់បង់ព្រៃឈើរបស់ខ្លួនប្រហែលមួយភាគបួន នៅក្នុងរយៈពេលពេល ៤០ឆ្នាំមកនេះ បណ្តាលមកការអភិវឌ្ឍន៍ឆាប់រហ័ស និងតម្រូវការឈើនៅក្នុងប្រទេសចិន ។




ប្រព័ន្ធផ្សព្វផ្សាយរដ្ឋក៏បានរាយការណ៍ឱ្យដឹងផងដែរថា លោកនាយករដ្ឋមន្ត្រី ហ៊ុន សែន បានមានប្រសាសន៍ថា គម្របព្រៃទំហំ១.៥លានហិកតាត្រូវបានប្រើសម្រាប់ដីព្រៃ៩.៥លានហិកតា នៅសល់ក្នុងប្រទេសនេះ ។ ប៉ុន្តែដោយសារដីសម្បទានសេដ្ឋកិច្ចទំហំ១.២លានហិកតាត្រូវបានប្រគល់ទៅឱ្យក្រុមហ៊ុនចម្ការកៅស៊ូនោះ លោក ហ៊ុន សែន បានមានប្រសាសន៍ថាតាមពិតការផ្តល់ដីទាំងនេះ គឺជាគម្របព្រៃទេ ។

**តទៅទំព័រទី ០៨**

## On World Environment Day, a Call to Save Cambodia's Forests

*By KuUON NARIM*
*THE CAMBODIA DAilY*

About 200 people celebrating World Environment Day yesterday gathered in front of the National Assembly to submit a petition asking the government to stop the destruction of Cambodia's forests.

Wearing masks depicting cows, wild al1s and owls, the crowd of forestry community members and environment a lists accused the government of neglecting the forests by granting economic land to firms that engage in illegal1ogging.

"Before, people went into the forest and were afraid of tigers, but now, they go into the forest and are afraid of the Okhna and that their companies will hurt them," said Theng Savoeun, secretarial coordinator of the Coalition of Cambodian Fanners Community, referring to the Cambodian honorific for a wealthy businessman.

A report released by the WWF last month said that Cambodia has lost almost a quarter of its forests in the past 40 years due to rapid development and China's demand for timber.

State media also reported that Prime Minister Hun Sen said that 1.5 million hectares of forest cover has been used for economic land concessions, while there remains 9.5 million hectares of forest cover left in the country. However, since 12 million hectares of these concessions have been toward rubber plantation, Mr. Hun Sen said that these land grants, in fact, constitute forest cover.

Mr. Savoeun said that people had gathered again this year as a similar petition handed to the National Assembly in 2012 had been ignored. "The National Assembly failed to do their obligation, [which is] to stop deforestation," he said, standing next to protesters holding signs that read "live Green, live Happy" and "Stop Deforestation."

"We have observed that companies who receive economic land concessions are causing extreme destruction to the forest which impacts the environment," Mr. Savoeun said. Vom Pao, who attended the demonstration, said that the key to stopping deforestation was to follow laws on conducting a proper environmental impact assessment (EIA) before large scale agriculture projects are allowed to go ahead.

'We urge the government to review EIAs before giving land concessions to companies who cut down trees," Mr. Pao said

*(Additional reporting by Denise Hniby)*

ឌឹ ខេមបូឌា ដេលី The Cambodia Daily

ដំណឹងប្រែសំរួលពីកាសារអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃ ព្រហស្បតិ៍ ទី០៦ ខែមិថុនា ឆ្នាំ២០១៣

# តួនាទីតំណាងរាស្ត្រ និងប្រាក់ខែបក្សប្រឆាំងត្រូវបានដកចេញ

**ផន បុប្ផា និង Colin Meyn**

**ខេមបូដា ដេលី**

គណកម្មាធិការអចិន្ត្រៃយ៍ដែលមានសមាជិកចំនួន១២រូបនៃរដ្ឋសភាដែលសុទ្ធតែជាសមាជិកសភាមកពីគណបក្សប្រជាជនកម្ពុជានោះ កាលពីម្សិលមិញបានសម្រេចដកតួនាទីសមាជិកសភា និងប្រាក់ខែរបស់សមាជិកសភាគណបក្សប្រឆាំង២៧រូបមកពីគណបក្ស សម រង្ស៊ី និងគណបក្សសិទ្ធិមនុស្ស ។

លោក ឈាង វុន និងលោក ជាម យៀប សមាជិកសភាជាន់ខ្ពស់មកពីគណបក្សប្រជាជនកម្ពុជាបានមានប្រសាសន៍ថា សេចក្តីសម្រេចនេះមានន័យថា សមាជិកសភាគណបក្សប្រឆាំងដែលកំពុងឈរឈ្មោះជាបេក្ខជនតំណាងរាស្ត្រគណបក្សសង្គ្រោះជាតិនៅក្នុងការបោះឆ្នោតជាតិដែលនឹងប្រព្រឹត្តិទៅនៅខែកក្កដាខាងមុខនេះ នឹងលែងមានសិទ្ធិចូលរួមក្នុងកិច្ចពិភាក្សាដេញដោលក្នុងសភា ឬទទួលបានប្រាក់ខែរបស់ខ្លួនទៀតហើយ ។

រដ្ឋាភិបាលបានលើកឡើងថា សមាជិកសភាទាំងនេះកំពុងបំពានច្បាប់បោះឆ្នោតដោយការចូលជាសមាជិកក្នុងគណបក្សចំនួន២ក្នុងពេលតែមួយ ។

លោក ឈាង វុន បានមានប្រសាសន៍ថា សមាជិក២រូបនៃគណបក្សនរោត្តម រណឫទ្ធិ ដែលពេលនេះលែងមានទៅហើយនោះ និងដែលកំពុងឈរឈ្មោះជាបេក្ខជនសម្រាប់គណបក្សហ៊្វុនស៊ិនប៉ិច ក៏ត្រូវបានដកចេញពីសភានៅក្នុងសេចក្តីសម្រេចនេះដែរ ។

លោក ឈាង វុន បានមានប្រសាសន៍ថា "យើងបានពិភាក្សាគ្នារួចហើយ ហើយគណៈកម្មាធិការ"អចិន្ត្រៃយ៍"បានយល់ព្រមបញ្ឈប់ការងារសមាជិកនៃគណបក្សចំនួន៣ គឺគណបក្ស សម រង្ស៊ី គណបក្សសិទ្ធិមនុស្ស និងគណបក្សនរោត្តម រណឫទ្ធិ សរុបមានចំនួន២៩រូប" ។ លោកមានប្រសាសន៍ថា សមាជិកសភានេះនឹងត្រូវហាមឃាត់មិនឱ្យចូលប្រជុំរហូតដល់អាណត្តិទី៥ចាប់ផ្តើមនៅខែកញ្ញា ។

លោកមានប្រសាសន៍បន្តថា "អ្នកទាំងអស់នេះបានបំពានអាណត្តិរបស់ខ្លួន ។ ពេលនេះពួកគេបានបាត់បង់សមាជិកភាពរបស់ខ្លួនហើយ ។ សមាជិកសភាម្នាក់មិនអាចស្ថិតនៅក្នុងគណបក្សពីរបានទេ ហើយយើងគ្មានសមាជិកគណបក្សសង្គ្រោះជាតិជាប់ឆ្នោតនៅរដ្ឋសភានោះទេ" ។

ការដកតួនាទីសមាជិកសភារបស់ពួកគេក៏មានន័យដែរថា នឹងគ្មានសមាជិកសភាគណបក្សប្រឆាំងណាម្នាក់មានវត្តមាននៅក្នុងរដ្ឋសភានៅថ្ងៃសុក្រខាងមុខនេះទេ នៅពេលសភាពិភាក្សាដេញដោលពីសេចក្តីព្រាងច្បាប់មួយស្តីពីការបដិសេធមិនទទួលស្គាល់ឧក្រិដ្ឋកម្មខ្មែរក្រហម ។

លោក ជាម យៀប សមាជិកសភាជាន់ខ្ពស់មកពីគណបក្សប្រជាជនកម្ពុជាបានមានប្រសាសន៍ថា បន្ទាប់ពីសេចក្តីសម្រេចរបស់គណៈកម្មាធិការអចិន្ត្រៃយ៍កាលពីម្សិលមិញលោក ហេង សំរិន ប្រធានរដ្ឋសភាបានចុះហត្ថលេខាលើញត្តិមួយដែលលោក ជាម យៀប បានដាក់ជូនកាលពីថ្ងៃទី៨ ខែឧសភា ស្នើសុំឱ្យផ្អាកប្រាក់ខែរបស់តំណាងរាស្ត្រគណបក្សប្រឆាំងដែលតំណាងឱ្យគណបក្ស សម រង្ស៊ី និងគណបក្សសិទ្ធិមនុស្សក្នុងពេលតែមួយខណៈដែលកំពុងឈរឈ្មោះជាបេក្ខជនតំណាងរាស្ត្រគណបក្សសង្គ្រោះជាតិក្នុងការបោះឆ្នោតខាងមុខនេះដែរនោះ ។

លោកមានប្រសាសន៍ថា "សម្តេចប្រធានបានចុះហត្ថលេខាលើលិខិតផ្អាកប្រាក់ខែនៅព្រឹកនេះបន្ទាប់ពីមានការពិភាក្សាក្នុងចំណោមសមាជិក១២រូបនៃគណៈកម្មាធិការនេះ" ។

លោក សម រង្ស៊ី ប្រធានគណបក្សសង្គ្រោះជាតិដែលកំពុងរស់នៅដោយនិរទេសខ្លួន និងដែលត្រូវបានហាមឃាត់មិនឱ្យចូលរួមប្រកួតប្រជែងក្នុងការបោះឆ្នោតក្នុងឆ្នាំនេះ ដោយសារតែលោកប្រឈមនឹងការជាប់ពន្ធនាគាររយៈពេល១១ឆ្នាំនៅក្នុងប្រទេសកម្ពុជានោះ មានប្រសាសន៍ថា សេចក្តីសម្រេចនេះមិនត្រូវតាមរដ្ឋធម្មនុញ្ញទេ ហើយបង្ហាញឱ្យឃើញថា គណបក្សប្រជាជនកម្ពុជាកំពុងតែភ័យខ្លាចចលនារួបរួមរបស់គណបក្សប្រឆាំង ។

លោកបាមានប្រសាសន៍ថា "សេចក្តីសម្រេចនេះខុសច្បាប់ទាំងស្រុង ពីព្រោះសមាជិកសភាត្រូវបានប្រជាពលរដ្ឋបោះឆ្នោតជ្រើសតាំង ហើយមានតែប្រជាពលរដ្ឋទេដែលអាចបញ្ចប់អាណត្តិរបស់ពួកគាត់បាន ។ លោក ហេង សំរិន មិនមែនជាប្រជាពលរដ្ឋបោះឆ្នោតឱ្យពួកគាត់ទេ ដូច្នេះញត្តិនេះខុសច្បាប់ទាំងស្រុង" ។

លោកបានមានប្រសាសន៍ថា សមាជិកសភាមកពីគណបក្សប្រជាជនកម្ពុជាបានធ្វើសេចក្តីសម្រេចបែបនេះ "ដោយសារតែពួកគេខ្លាចប្រជាប្រិយភាពនៃការគាំទ្រកាន់តែខ្លាំងឡើងចំពោះគណបក្សសង្គ្រោះជាតិ ដូច្នេះពួកគេធ្វើអ្វីៗដែលពួកគេអាចធ្វើទៅបានរួមទាំងការធ្វើសេចក្តីសម្រេចខុសច្បាប់ផងដែរ ដើម្បីធ្វើឱ្យយើងចុះខ្សោយកម្លាំង" ។ **តទៅទំព័រទី ១៤**

## Opposition Lawmakers Stripped of Posts, Salaries

*By PHORN BOPHA AND COLIN MEYN THE CAMBODIA Daily*

The 12-member National Assembly permanent committee, made up entirely of CPP lawmakers, decided yesterday to strip 27 opposition lawmakers from the SRP and Human Rights Party (HRP) of their parliamentary status and salaries.

The decision means that opposition members of Parliament, who are all running in July's election as candidates for the Cambodia National Rescue Party (CNRP), will no longer be eligible to participate in parliamentary debates or receive their monthly salaries, said senior CPP lawmakers Chheang Vun and Cheam Yeap.

The government says the lawmakers are in violation of the election law by simultaneously holding membership in two parties at the same time.

Two members of the now disbanded Norodom Ranariddh Party (NRP), who are now running as candidates for the Funcinpec party, have also been removed from the National Assembly as part of the decision, said Mr. Vun.

"We held discussions and the [permanent] committee agreed to freeze the members of three parties, Sam Rainsy Party, Human Rights Party and NRP, which makes 29 members altogether," Mr. Vun said, adding that the lawmakers would be banned from Parliament until the country's fifth democratic mandate begins in September.

'These people abused their mandate. Now they lost their membership. A lawmaker cannot be in two parties, and we don't have any CNRP members elected to the national Assembly," he added.

Stripping them of their parliamentary status also means that no opposition lawmakers will be present in the National Assembly on Friday when it debates a draft law on the denial of khmer Rouge crimes.

Senior CPP lawmaker Mr. Yeap said that after the permanent committee's discussion yesterday, National Assembly President Heng Samrin signed on to a petition that Mr. Yeap submitted on May 8, calling for a pay freeze of opposition parliamentarians representing the SRP and HRP while simultaneously running as CNRP candidates in the election.

"The president signed the paperwork for the wage freeze this morning after the discussion among 12 members of the committee," he said.

Sam Rainsy, the self exiled CNRP president who has been banned from competing in this year's election due to an 11-year prison sentence he faces in the country, said that the decision was unconstitutional and revealed how frightened the CPP is of a united opposition movement."This is totally illegal because members of the National Assembly are elected by the people and only the people can put an end to their mandate. Heng Samrin is not the people therefore this petition is completely illegal," he said.

The CPP lawmakers made the decision "because they are afraid of the growing popularity of support for the National Rescue Party, so they are doing whatever they can, including making illegal decisions, to try to undermine us," he said.

While legal experts were mixed yesterday on the legality of the decision, political analysts and rights activists said that the move was not so much a legal matter as it was another example of the CPP using its political might to intimidate the opposition and manipulate the Country's legislative process.

"This is just for political gain giving a hard time to the opposition," said independent political analyst Chea Vannath.

'The ruling party might have a plausible reason to do so, but..it just shows that the democracy is not at a mature stage yet in Cambodia," she added.

Thun Saray, the president of rights group Adhoc, said that the decision will prevent opposition members of Parliament from benefitting from their parliamentary protections and limit their financial means during the crucial month long campaign period, which begins in three weeks.

'The prob1em is they have immunity if they don't withdraw their membership from Parliament [Normally], they can do the campaign without any kind of physical violation or arbitrary arrest because they have immunity, and if they have that money [from their salaries] they can campaign also," he said. **Continued on page 08**

# គ្លូបលវិតណេសរាយការណ៍ពីបរិស្ថាននៅកម្ពុជា

(តពីលេខមុន)

ក្នុងឆ្នាំ ២០០៦ រដ្ឋមន្ត្រីបានការពារសេចក្តីសម្រេចចិត្តរបស់គាត់ក្នុងលក្ខខណ្ឌដូចខាងក្រោមនេះ :

"ការអនុញ្ញាតរបស់យើងឱ្យក្រុមហ៊ុនSeng Keang Company ដើម្បីបង្កើតរោងចក្រអារឈើក្នុងទីរីង គឺស្របតាមច្បាប់ព្រៃឈើ ដោយសារ (រោងចក្រអារឈើ) មិនស្ថិតនៅក្នុងព្រំដែនព្រៃឈើ ប៉ុន្តែស្ថិតក្នុងកណ្តាលតំបន់អភិវឌ្ឍន៍ចំការកៅស៊ូទីរីង [១៥៧] ។"

ការសំអាងនេះ មិនអាចជឿបានឡើយ ដោយសារតែតំបន់ចំការកៅស៊ូ ត្រូវបានចងភ្ជាប់គ្រប់ផ្នែកទាំងអស់ដោយព្រៃឡង់ ហើយរោងចក្រអារឈើរបស់ក្រុមហ៊ុនSeng Keang Company នៅចម្ងាយមិនដល់មួយគីឡូម៉ែត្រពីព្រៃ ដែលជាបរិវេណភាគខាងកើតរបស់ចំការ ។

ការអនុញ្ញាតរបស់ ចាន់ សារុន បង្កើតឱ្យមានចម្ងល់បន្ថែមទៀតពីរបៀបដែលគាត់សម្រុះសម្រួលការអះអាងជម្លោះរបស់គាត់ទៅលើទីរីង និងអ្នកដែលទទួល "គុណប្រយោជន៍ពីការផ្លាស់ប្តូរ" ។ រដ្ឋមន្ត្រីបានបញ្ជាក់ថា មានឈើមានតម្លៃតិចតួចនៅក្នុងទីរីង ទោះយ៉ាងណាក៏ដោយ គាត់បានជ្រើសរើសអនុញ្ញាតឱ្យសាងសង់រោងចក្រឈើអារ និងក្តារបន្ទះដែលមានសង្វាក់ផលិតកម្មមិនតិចជាងបួន ។តើកន្លែងណាដែលគាត់បានរំពឹងទុកថា ក្រុមហ៊ុន Seng Keang Company នឹងទទួលបានឈើរបស់ក្រុមហ៊ុន ?

ជាថ្មីម្តងទៀត ចាន់ សារុន ទំនងជាបានបំពានមាត្រា ១០០ នៃច្បាប់ព្រៃឈើ ។ ទោះយ៉ាងណាក៏ដោយ ស្របពេលដែលមានភាពខុសច្បាប់ស្ទើរតែជាក់ច្បាស់យ៉ាងនេះទៅហើយនោះ វិធានការណ៍របស់រដ្ឋមន្ត្រី គឺកំពុងតែស្របជាមួយវប្បធម៌មិនយោបាយទាំងស្រុង ដែលការិយាល័យរដ្ឋត្រូវបានដឹងថា ជាការផ្តល់អាជ្ញាប័ណ្ណ ដើម្បីគេចផុតពីច្បាប់ ជាជាងការទទួលខុសត្រូវអនុវត្ត ។

នៅត្រីមាសចុងក្រោយនៃឆ្នាំ ២០០៤ ក្រុមហ៊ុន Seng Keang Company បានដំណើរការសាងសង់រោងចក្រ និងរោងចក្រផលិតក្តារបន្ទះដែលបំពាក់ដោយគ្រឿងម៉ាស៊ីនថ្មីនាំចូលពីប្រទេសចិន [១៥៨] ។ ពិធីសម្ពោធរោងចក្រ ត្រូវបានផ្តល់កិត្តិយសដោយមន្ត្រីជាន់ខ្ពស់មកពីភ្នំពេញ [១៥៩] ។ សេង កុកហ៊ាង ទទួលខុសត្រូវចាត់ចែងរោងចក្រ ហើយនៅចុងឆ្នាំ ២០០៤ ក្រុមហ៊ុនកំពុងដំណើរការកាប់ឈើច្បោះរបស់អ្នកភូមិជាច្រើននៅខាងក្រៅព្រំប្រទល់ចំការ [១៦០] ។

### ៣.៦ ឈើចាស់ៗ និងការបាត់បង់ការចងចាំរបស់ម្ចាស់ជំនួយ

ក្នុងចុងឆ្នាំ ២០០៤ ប្រតិបត្តិការរបស់ ឌី ចូច, សេង គាង និង ឃុន ថុង បានទទួលការជម្រុញបន្ថែមទៀត នៅពេលដែលលែងហាមប្រាមជាបណ្តោះអាសន្នចំពោះការបញ្ឈប់ការដឹកជញ្ជូនឈើ ដែលបានអនុញ្ញាតឱ្យពួកគេប្រើប្រាស់ឈើ ដែលនៅបន្សល់ក្នុងចំការកៅស៊ូទីរីង ដោយសម្បទានិកឈើក្រុមហ៊ុន Colexim Enterprise ។ ក្រុមហ៊ុន Colexim Enterprise បានទទួលយកតួនាទីដឹកនាំក្នុងដើមខែ ដើម្បីធ្វើប្រតិបត្តិការឈូសសំអាតក្នុងទីរីង ហើយដោយយោងតាមកំណត់ត្រារបស់ខ្លួន "ប្រមូលបាន" ឈើចំនួន ៣,៣៩៥ [១៦១] ។ បន្ទាប់ពីមានការបញ្ចូលនូវការបញ្ឈប់ជាបណ្តោះអាសន្នឈើចំនួន ២,៨១២ នៃឈើទាំងនេះបន្សល់ទុកនៅក្បែរផ្លូវទៅកាន់ចំការ ។ អធិការកិច្ចរបស់ Global-Witness ទៅលើឈើទាំងនេះបានបង្ហាញថា យ៉ាងហោចណាស់ចំនួន ៥០% មានប្រហោងយកជ័រ ដែលអាចប្រាប់ថា ក្រុមហ៊ុនបានកាប់ដោយខុសច្បាប់ [១៦២] ។

ការប្រមូលឈើចាស់ៗ ត្រូវបានបង្កើតឡើងយ៉ាងល្អ ជាការគ្របបិទបាំងប្រតិបត្តិការកាប់ឈើខុសច្បាប់ក្នុងប្រទេសកម្ពុជា ហើយ ហ៊ុន សែន បានហាមប្រាមការអនុវត្តនេះនៅក្នុងឆ្នាំ ១៩៩៩ ។ ដោយមិនខ្វល់ ក្រុមហ៊ុនColexim បានបញ្ចុះបញ្ចូលយ៉ាងយូរសុំការអនុញ្ញាតដឹកជញ្ជូនឈើចេញពីទីរីងទៅកាន់រោងចក្ររបស់ខ្លួននៅតាមផ្លូវជាតិលេខ ៥ [១៦៣] ។ ក្នុងឆ្នាំ ២០០៣ ក្រុមហ៊ុនបានដាក់ជូនសំណើផ្លូវការទៅកាន់រដ្ឋាភិបាល ដោយការជម្រុញដោយស្ងាត់ស្ងៀមរបស់ធនាគារពិភពលោក [១៦៤] ។ ស្របពេលជាមួយគ្នានេះដែរ ចាន់ សារុន បានសុំការគាំទ្រពីក្រុមការងារគ្រប់គ្រងធនធានធម្មជាតិ (WGNRM) នៃម្ចាស់ជំនួយអន្តរជាតិសម្រាប់ការលើកលែងការបញ្ឈប់ការដឹកជញ្ជូនឈើ ។ WGNRM បានឆ្លើយតបដោយសំបុត្រពីរទៅកាន់រដ្ឋមន្ត្រី ដោយបាននិយាយថា :

"ការដឹកជញ្ជូនឈើដែលបានស្នើ មិនអាចកាត់ផ្តាច់ចេញពីប្រភពដើមនៃឈើឡើយ ។ ការយល់ដឹងរបស់យើងចំពោះការអភិវឌ្ឍន៍ចំការកៅស៊ូទីរីង គឺកំពុងមានបញ្ហាខ្លាំងណាស់... សហគមន៍ជាច្រើនត្រូវបានផ្លាស់ទីកន្លែង ហើយបាត់បង់ការចិញ្ចឹមជីវិតដែលបានបង្កើតឡើងរបស់ពួកគេ ... ការព្រួយបារម្ភចម្បងរបស់យើង គឺថាការដឹកឈើដែលបានទទួលការអនុញ្ញាតណាមួយ មិនត្រូវបង្កើតឱ្យមានឱកាសសម្រាប់ដឹកឈើដែលបានកាប់ខុសច្បាប់ថ្មី [sic] ឬការដឹកឈើដែលបានកាប់រំលំដោយខុសច្បាប់ឡើយ ។ ដោយសារហេតុផលនេះហើយ ដែលក្រុមការងារបានជម្រុញក្នុងឆ្នាំ ២០០២... ឱ្យមាននូវការបញ្ឈប់ការដឹកឈើ [១៦៥] ។"

"យើងក៏ឃើញមានទិដ្ឋភាពបរិស្ថាន (សំណឹក) ក៏ដូចជាបញ្ហាសង្គមរបស់គម្រោងទីរីង ដែលភ្ជាប់យ៉ាងជិតស្និទ្ធទៅនឹងតំនិតបង្កើនការដឹកជញ្ជូនដោយមានការគ្រប់គ្រង និងការលក់ឈើពីតំបន់គម្រោងផងដែរ ។ ទោះបីជាមានការអះអាងដែលអ្នកបានផ្តល់ឱ្យក៏ដោយ យើងនៅតែមិនអាចយល់ព្រមចំពោះការដឹកឈើទាំងអស់នេះ [១៦៦] ។"

ទោះយ៉ាងណាក៏ដោយ នៅពេលដែល ចាន់ សារុន បានជម្រុញឱ្យមានការធ្វើដឹកឈើបន្តទៀត នៅឯកិច្ចប្រជុំក្រុមពិគ្រោះផ្តល់យោបល់ក្នុងខែធ្នូ ឆ្នាំ២០០៤ ម្ចាស់ជំនួយបានសម្រេចចិត្តផ្តល់ការគាំទ្ររបស់ពួកគេលើផែនការរបស់ពួកគេ ។ ក្នុងរយៈពេលចន្លោះនេះ គ្មានអ្វីផ្លាស់ប្តូរនោះទេ ស្ថិតនៅពីក្រោយការធ្វើឱ្យកាន់តែយ៉ាប់នូវស្ថានភាពក្នុងទីរីង ដោយសារប្រតិបត្តិការរបស់ក្រុមហ៊ុន Seng Keang Company បានពង្រីក ហើយអ្នកយកជ័រកាន់តែច្រើនបានបាត់បង់ដើមឈើរបស់ពួកគេ ។ ក្នុងខែ មករា ឆ្នាំ ២០០៥ សម្បទានិកចាប់ផ្តើមដឹកឈើយ៉ាងច្រើន ភាគច្រើននៃឈើទាំងនេះជាដើមច្បោះ ដែលបានកាប់រំលំដោយខុសច្បាប់ ។ការគាំទ្ររបស់ម្ចាស់ជំនួយ បានក្លាយទៅជាភស្តុតាងចម្បងរបស់ ចាន់ សារុន ចំពោះការបញ្ចប់នូវការបញ្ឈប់ការដឹកឈើ [១៦៧] ។

ស្របជាមួយក្រុមហ៊ុន Colexim អ្នកទទួលប្រយោជន៍មួយក្នុងចំណោមអ្នកទទួលប្រយោជន៍ជាច្រើន គឺក្រុមហ៊ុន Seng Keang Company ពេលនោះការដឹកឈើដែលបានបន្តក្នុងខែមករាឆ្នាំ២០០៥ បានទិញឈើជាច្រើនពាន់ដើមក្នុងទីរីង ក្នុងតម្លៃUS$ ២១៦,៣៩៧ [១៦៨] ។ ក្រុមនេះបានដំណើរការយកឈើទាំងនេះ ទៅកាន់រោងចក្រក្រុមហ៊ុន Kingwood តាមឡាន មុនពេលផ្ទុកម្តងទៀតទៅក្នុងកប៉ាល់ និងលក់ទៅឱ្យរោងចក្រអារឈើបន្តទៀតនៅខាងក្រោមទន្លេមេគង្គ [១៦៩] ។

តំណាងរបស់ម្ចាស់ជំនួយ ដែលពីមុនបានបង្ហាញពីការបារម្ភពីការដឹកឈើដែលបានស្នើឡើងពីទីរីង មិនបានលើកឡើងពីបញ្ហាបន្ថែមទៀតពីប្រភពឈើ ឬគំនិតអនុញ្ញាតឱ្យក្រុមហ៊ុនដែលមានការសង្ស័យនេះ ទាញយកប្រយោជន៍ពីសកម្មភាពខុសច្បាប់ទាំងនេះឡើយ ។



ឈើចាស់ៗ : ពិទីងទៅកាន់រោងចក្រក្រុមហ៊ុន Kingwood និងផ្សេងទៀត ខែ កុម្ភៈ ឆ្នាំ ២០០៤

ទាំងក្រុមហ៊ុនរបស់ប្រទេសស្វីស SGS ដែលបានគ្រប់គ្រងជាអ្នកត្រួតពិនិត្យផ្លូវការនូវកិច្ចខិតខំប្រឹងប្រែងដោះស្រាយបទល្មើសព្រៃឈើ បន្ទាប់ពីការដក Global Witness ចេញ ក៏មិនមានចម្ងល់អ្វីដែរ ។ SGS បានជូនដំណឹងដល់ Global Witness ក្នុងខែ កុម្ភៈ ឆ្នាំ ២០០៧ ថា " SGS មិនត្រូវបានស្នើសុំឱ្យស៊ើបអង្កេត ឬផ្តល់ទស្សនៈណាមួយពាក់ព័ន្ធនឹងប្រភពដើមនៃឈើទាំងនេះ ដែលត្រូវបានប្រមូលផលបានយ៉ាងប្រសើរមុនពេលចាប់ផ្តើមចុះកិច្ចសន្យាជាមួយ SGS" ។ SGS ត្រូវបានជូនដំណឹងដោយក្រុមម្ចាស់ជំនួយថា ពួកគេបានសម្រេចឱ្យមានការដឹកឈើ ដោយមានលក្ខខណ្ឌថា ត្រូវបានគ្រប់គ្រងព្យាយាម និងធានាថា គ្មានឈើស្រស់ ឬឈើបន្ថែមទៀត អាចចូលទៅក្នុងចង្វាក់ផ្គត់ផ្គង់បានឡើយ [១៧០] ។"

### ៤. ការវិភាគប្រតិបត្តិការកាប់ឈើខុសច្បាប់

សូមអរគុណដល់គម្រោងចំការកៅស៊ូជប់ និងលិខិតអនុញ្ញាតដែលផ្តល់ដោយ ចាន់ សារុន, ឌី ចូច, សេង គាង និង ឃុន ថុង បានរៀបចំបង្កើតនៅចំកណ្តាលព្រៃឡង់ ដែលជាធនធានព្រៃឈើដ៏មានតម្លៃបំផុតរបស់ប្រទេសកម្ពុជា ។ មិនទំនងដែលពួកគេអាចជ្រើសរើសទីតាំងដែលប្រសើរជាងនេះ សម្រាប់សកម្មភាពរបស់ពួកគេឡើយ ហើយទីរីងបានក្លាយជាមជ្ឈមណ្ឌលប្រតិបត្តិការកាប់ឈើខុសច្បាប់ដ៏ធំបំផុតយ៉ាងពិតប្រាកដក្នុងប្រទេសកម្ពុជា ។ ផ្នែកនេះរៀបរាប់ពីលទ្ធផលស៊ើបអង្កេតរបស់ Global Witness ទៅក្នុងសមាសភាពសំខាន់ៗរបស់ប្រតិបត្តិការនេះ ។



ឈើដូចគ្នានេះ ត្រូវបានផ្ទុកក្នុងទុកនៅរោងចក្រ Kingwood និងត្រូវបានលក់ទៅកាន់រោងចក្រអារឈើនៅខាងក្រោមទន្លេមេគង្គ ដែលរួមមានទាំងរោងចក្រអារឈើរបស់ ឃុន ធុង តាមផ្លូវជាតិលេខ ២ ផងដែរ (បង្ហាញនៅខាងលើ)

តនៅលេខក្រោយ

## Lawmakers ...

CONTINUED FROM PAGE 7

Independent political analyst Lao Mong Hay said the decision may also delegitimize a controversial law on the criminalization of the denial of khmer Rouge atrocities set to be debated in the national Assembly on Friday.

'The decision affects the legitimacy of any law that might be enacted during this period, for instance the genocide denial law. If enacted without the participation of those [members of Parliament), that law will not have much legitimacy, to say the least," he said.

The law on the Election of Members of the National Assembly states that "a candidate who resigns from his party shall automatically lose his membership in the National Assembly," but says that if the nation occurs more than six months before an election, the party may replace the parliamentarian.

Sok Sam Oeun, a lawyer and director of the of legal aid group Cambodia Defenders Project, said if the SRP and HRP parliamentarians were now registered with the CNRP, that meant they had left their original party. If other people were to take their place, it would need to be more than six months before the election.

"So, the government and CPP members can complain about that and control their salary," he said.

Koul Panha, executive director of the Committee for Free and Fair Elections in Cambodia, admitted that the legality of the decision was murky, but said that "the Spirit of the law" was meant to allow members of the National Assembly to change parties without risking their former party's seat in Parliament

'The CPP is able to do anything for their benefit During election time, they try to make members of the opposition fare trouble," he said.

តមកពីទំព័រទី ៦

## នៅទិវាបរិស្ថានពិភពលោក...

លោក ថេង សាវឿន បានមានប្រសាសន៍ថា ប្រជាពលរដ្ឋបានប្រមូលផ្តុំគ្នាម្តងទៀតនៅឆ្នាំនេះ ព្រោះញត្តិមួយស្រដៀងគ្នានេះ ដែលប្រគល់ជូនរដ្ឋសភាកាលពីឆ្នាំ២០១២នោះ មិនបានទទួលការឆ្លើយតបទេ ។ ពេលឈរនៅក្បែរក្រុមអ្នកតវ៉ាដែលកាន់បដាមានខ្លឹមសារថា "រស់នៅក្នុងពណ៌បៃតងរស់នៅក្នុងភាពសប្បាយរីករាយ" និង"បញ្ឈប់ការកាប់បំផ្លាញព្រៃឈើ" នោះលោកបានមានប្រសាសន៍ថា "រដ្ឋសភាមិនបំពេញកាតព្វកិច្ចរបស់ខ្លួន ដើម្បីបញ្ឈប់ការកាប់បំផ្លាញព្រៃឈើទេ"។

លោក ថេង សាវឿន បានមានប្រសាសន៍ថា "យើងបានសង្កេតឃើញថា ក្រុមហ៊ុនដែលទទួលបានដីសម្បទាសេដ្ឋកិច្ចកំពុងបង្កឱ្យមានការកាប់បំផ្លិចបំផ្លាញព្រៃឈើយ៉ាងខ្លាំងដែលធ្វើឱ្យប៉ះពាល់ដល់បរិស្ថាន"។

លោក វ៉ន ប៉ាវ ដែលបានចូលរួមនៅក្នុងការធ្វើបាតុកម្មនេះបាននិយាយថា គន្លឹះក្នុងការបញ្ឈប់ការកាប់បំផ្លាញព្រៃឈើ គឺត្រូវធ្វើតាមច្បាប់ស្តីពីការវាយតម្លៃលើផលប៉ះពាល់ដល់បរិស្ថានឱ្យបានត្រឹមត្រូវនៅអនុញ្ញាតឱ្យមានគម្រោងកសិកម្មទ្រង់ទ្រាយធំ ។

លោក វ៉ន ប៉ាវ និយាយថា "យើងជំរុញឱ្យរដ្ឋាភិបាលត្រួតពិនិត្យការវាយតម្លៃពីផលប៉ះពាល់ដល់បរិស្ថានមុនពេលផ្តល់ដីសម្បទានទៅឱ្យក្រុមហ៊ុនដែលរកស៊ីកាប់ឈើ"៕

*(រាយការណ៍បន្ថែមដោយ*

*Denise Hruby)*

*ប្រែសម្រួលដោយ ស៊ុំ សុខភុំ)*

តមកពីទំព័រទី ២

## អ្នកភូមិវត្តគរជីវភាពមិនសុីវិល័យតែ...

វត្តសុំសីលស្តាប់ធម៌ការប្រគេនចង្ហាន់ និងគ្រឿងឧបភោគបរិភោគនានាប្រារព្ធពិធីបុណ្យផ្សេងៗ។

ធ្វើដំណើរពីទីរួមខេត្តស្ទឹងសង្កែស្ថិតនៅខាងឆ្វេងដៃនៃផ្លូវលំភូមិវត្តគរដែលជាផ្លូវកូនកាត់កៅស៊ូ និងដីក្រហម ។ ស្ទឹងសង្កែបានផ្តល់ដល់ទឹកត្រី (រាល់ពេលខែត្រីឡើងគេអាចនេសាទ ធ្វើសម្រះបង់ដោយសំណាញ់ និងបានត្រីជាច្រើនដែលអ្នកភូមិអាចយកទៅឆ្អើរធ្វើប្រហុក-ល-) ការស្រោចស្រពដំណាំ និងផ្តល់ភាពងាយស្រួលដល់ការរស់នៅប្រចាំថ្ងៃរបស់អ្នកភូមិវត្តគរបានយ៉ាងប្រសើរ។ ក្រៅពីវត្ត និងស្ទឹងភូមិវត្តគរមានសាលារៀនសម្រាប់កុមារាកុមារី និងយុវជន ព្រោះមានទាំងសាលាបឋមសិក្សាវត្តគរ និងអនុវិទ្យាល័យវត្តគរ។

ពិនិត្យទៅលើរចនាបថនៃផ្ទះសំបែងភូមិវត្តគរមានផ្ទះបុរាណដែលបន្សល់ទុកបន្តពីសម័យលោកឧកញ៉ា នូ ពិនិត្យភឹង និងលោកជំទាវ កើត យ៉ុន ហើយផ្ទះបុរាណនេះក៏ជាទីទេសចរណ៍ដ៏ប្រជាប្រិយមួយដែលភ្ញៀវទេសចរក្នុងតំបន់ និងទាំងជាតិក៏ដូចជាអន្តរជាតិចង់ទស្សនាកំសាន្ត និងស្វែងយល់ ។ ជាមួយគ្នានេះក៏មានក្រុមហ៊ុនភាពយន្តក្នុងប្រទេសល្បីៗមួយចំនួនជ្រើសរើសយកទិដ្ឋភាពនិងទីតាំងថតលើផ្ទះបុរណនេះមានជាអាទិ៍រឿងភូមិគ្រឹះចំឡែកជាដើម ។ រីឯផ្ទះអ្នកស្រុកក្នុងភូមិវត្តគរក៏មានលក្ខណៈមិនខុសពីផ្ទះបុរាណនោះដែរ គឺមានរចនាបថត្រដមត្រសងនឹងគ្នា ហើយជាទូទៅផ្ទះនិមួយៗរមែងតែងមានព្រះភូមិនៅអែបនឹងខាងមុខ ឬចំហៀងនៃផ្ទះ ព្រោះជាផ្នែកមួយនៃជំនឿរបស់ប្រជាជនខ្មែរ។

អ្នកភូមិវត្តគរប្រកបរបរដោយឡែកៗពីគ្នា ហើយភូមិនេះត្រូវបានលាយឡំដោយមនុស្សគ្រប់ស្រទាប់វណ្ណៈរាប់ចាប់តាំងពីអ្នកលក់អីវ៉ាន់បន្លែផ្លែឈើចំការតាមចិញ្ចើមផ្លូវនៅផ្សារក្រមួនឱ្យឈ្មោះថា ផ្សារស្វាយឆ្អេះអ្នកលក់ចាប់ហួយ អ្នកលក់មីគុយទាវ អ្នកមូរណែម ឬសង្វាក់ (អ្នកបាត់ដំបងហៅណែមថា សង្វាក់) អ្នកធ្វើចំការដាំបន្លែកសិករធ្វើស្រែគ្រូបង្រៀនគ្រូពេទ្យអ្នកជំនួញ និងម្ចាស់កសិដ្ឋានចិញ្ចឹមក្រពើគោក្របីមាន់ទា។ល។ ទោះជាកម្រិតជីវភាពខ្ពស់ទាបទីទៃពីគ្នាយ៉ាងណាក៏ដោយក៏អ្នកភូមិវត្តគរទាំងអស់រស់នៅដោយសុខស្រួល និងមានសុខុមាលភាពល្អបានដូចគ្នា ព្រោះបរិស្ថានរស់នៅបែបធម្មជាតិរបស់អ្នកភូមិនេះធ្វើឱ្យលកខណ្ឌនៃការរស់នៅអំណោយផលបានយ៉ាងប្រសើរ។

រីរសជាតិអាហារស្នាដៃធ្វើម្ហូបអ្នកភូមិវត្តគរក៏មានលក្ខណៈដោយឡែក និងសំបូរបែបមានជាអាទិ៍ការទទួលទានត្រីសាច់គោជ្រូកមាន់ទាលលកចាបកង្កែបអន្ទង់ដែលគេយកទៅស្ងោរឆាចៀនហើយបរិភោគជាមួយបន្លែដែលដាំក្នុងចំការ ឬប្រមាត់ស្ទឹង ឬរបងផ្ទះជាដើមមានដូចជាស្លឹកបះ ស្លឹកម្រុំ ជី ត្រួយអំពិល ម្រះព្រៅ ពេលខ្វះខាតគ្រឿងណាមួយគេអាចឆ្លងពីផ្ទះមួយទៅផ្ទះមួយសុំខ្ចីសិនក៏មាន។ ចំណែករសជាតិបង្អែម និងនំអន្សមនំគមនំបត់នំថ្មីរបស់អ្នកទីនេះក៏ល្បីថាឆ្ងាញ់ផងដែរ។

ចំពោះជាតិព័ន្ធអ្នកភូមិវត្តគរត្រូវបានលាយឡំដោយប្រជាជនខ្មែរព្រមទាំងជាតិសាសន៍ដទៃទៀតដែលជាខ្មែរកូនកាត់មានដូចជាខ្មែរកាត់ចិនខ្មែរកាត់វៀតណាមជាដើម ហើយគេរស់នៅសុខសាន្តជាមួយគ្នាកម្រនឹងក្តីក្តាំជាមួយគ្នាណាស់ ។





ពួកគេផ្លាស់ប្តូរវប្បធម៌អរិយធម៌គ្នាទៅវិញទៅមក ។ រាល់ពេលហេមន្តស្សន្តរដូវចូលឆ្នាំខ្មែរ ឬភ្ជុំបិណ្ឌប្រជាជនក៏ប្រារព្ធពិធីបុណ្យនោះលុះដល់ពេលចូលឆ្នាំចិន ឬក៏សែនក្បាលទឹក(ឆេងម៉េង) គេក៏មិនភ្លេចធ្វើដែរ។

បរិស្ថានរស់នៅល្អរបស់អ្នកភូមិវត្តគរគួរជានិមិត្តរូបគម្រូដល់តំបន់ដទៃដែលមិនទាន់បានប្រសើរឱ្យស្វែងយល់ និងកែលម្អឱ្យបានរីកចំរើន ។ យ៉ាងណាមិញផ្លូវលំក្នុងភូមិវត្តគរត្រូវការការជួសជុលដើម្បីបង្កភាពងាយស្រួលក្នុងការធ្វើដំណើររបស់ប្រជាជនក្នុងភូមិ និងអ្នកដំណើរដទៃទៀតផងដែរ ។ គួរបញ្ជាក់ផងដែរ ផ្លូវលំភូមិវត្តគរអាចនាំអ្នកដំណើរឱ្យឆ្លងកាត់ជ្រាំងបាក់ ហើយគេអាចបន្តដំណើរដល់កំពង់សីម៉ា កំពង់អំពិលដែលមានស្ពានយោល ខ្សាច់ពោយ កន្ទឺ និងដល់បាណន់ដែលមានប្រាសាទបាណន់សង់លើកំពូលភ្នំហើយដែលជារមណីយដ្ឋានដ៏ល្បីល្បាញប្រចាំខេត្តបាត់ដំបង។

**បាត់ដំបងបណ្តូលចិត្ត**

-បងដើរមាត់ស្ទឹងព្រជើងពូនយំ ឆ្លងដល់ជម្រំ
ចំការក្រូចស្រី
ម្លិះរួតប្រឹងរីកទទួលកវី ប្លែកតែរូបស្រីមិនឃើញភក្រ្តា។
-អូនដើរបេះក្រូចបងលួចមើលមុំ ចំការស្រីធំជាច្រើនហិចតា
សាវម៉ាវចេញផ្លែសង្កែចេញផ្កា ដូចណាត់ចិន្តាឱ្យជួបកវី។
-គោវត្តតាមីមគ្រហឹមដាក់ខ្ញុំ ការពាររូបមុំក្រពុំពេញវ័យ
អូនចុះងូតទឹកលើស្ពានកោះថ្មី បងភ្លឹកស្មារតីព្រោះស្រីល្អណាស់។
-រឿងបាត់ដំបងចងចិត្តខ្ញុំហើយ ស្ទឹងសង្កែអើយកុំហូរបញ្ច្រាស់
សូមលោកមេបាមីងមាក្មេងចាស់ សូមប្រណីខ្លះដល់កវីផង៕

## តមកពីទំព័រទី ១ ទស្សនកិច្ចរយៈពេលខ្លីលើដីអាមេរិក...

អនុប្រធានស្តីទីរបស់គណបក្សប្រឆាំងមួយនេះ បានធ្វើទស្សនៈកិច្ចរយៈពេលដ៏ខ្លីមួយដែលទស្សនៈបែបនេះពុំធ្លាប់មានសម្រាប់លោកឡើយ ។

តាមពិតនេះ ពុំមែនជារឿងប្លែកសម្រាប់លោក កឹម សុខា ឡើយ ហើយសម្រាប់មជ្ឈដ្ឋានមហាជននឹងអ្នកតាមដានព្រឹត្តិការណ៍នយោបាយកម្ពុជា ពិតជាយល់យ៉ាងច្បាស់ថា គោលបំណងក្នុងដំណើរទស្សនៈកិច្ចមកកាន់សហរដ្ឋអាមេរិកនាគ្រានេះ គឺគ្មានអ្វីក្រៅអំពីការគៀងគររកជំនួយផ្នែកហិរញ្ញវត្ថុពីសំណាក់អ្នកគាំទ្រសម្រាប់ប្រតិបត្តិការណ៍លើតម្រូវការរបស់បក្សនោះឡើយ ។

ថ្លែងទៅកាន់សមាជិកសមាជិកាព្រមទាំងអ្នកចូលរួមប្រមាណជាង៣០០នាក់ ក្នុងកម្មវិធី "ពន្លឺព្រះអាទិត្យ"ដែលបានប្រារព្ធធ្វើឡើងនៅឯបរិវេណដ៏ធំល្វឹងល្វើយនៃវត្ត"ប៉ាលេលេយ្យ"នាទីក្រុងហ្វីឡាដែលហ្វៀកាលពីថ្ងៃសៅរ៍ទី១ខែមិថុនាកន្លងមកនេះ លោក កឹម សុខា បានឱ្យដឹងថា បច្ចុប្បន្នគណបក្សសង្គ្រោះជាតិកំពុងតែមានសន្ទុះ និងមានប្រៀបយ៉ាងខ្លាំងលើគណបក្សប្រជាជនកម្ពុជា ។

លោកបន្តថា ឥឡូវគណបក្សសង្គ្រោះជាតិមានគោលការណ៍នយោបាយល្អៗដែលជាហេតុធ្វើឱ្យប្រជាពលរដ្ឋ និងអ្នកគាំទ្រគណបក្សប្រជាជនកម្ពុជា ជាពិសេសមន្ត្រីរាជការបានងាកមកគាំទ្រគណបក្សសង្គ្រោះជាតិវិញ ។

អនុប្រធានស្តីទី និងជាបេក្ខភាពប្រធានរដ្ឋសភារូបនេះបានអះអាងទៀតថា ថ្វីបើសកម្មជនរបស់បក្សប្រជាជនកម្ពុជាមួយចំនួនបានដើរឃោសនាអំពីគោលការណ៍ និងជំរុញឱ្យមានការបោះឆ្នោតដល់គណបក្សប្រជាជនកម្ពុជាយ៉ាងណាក្តី ប៉ុន្តែនៅពេលចប់ភារៈកិច្ចឃោសនា ពួកគាត់បែរជានិយាយទៅកាន់ប្រជាពលរដ្ឋផ្សេងពីអ្វីដែលពួកគាត់បានឃោសនាតាមកញ្ចក់ទូរទស្សន៍ ឬតាមវិទ្យុ ។ ក្នុងន័យនេះត្រូវបានគេចងចាំ និងនឹកឃើញដល់លោក កឹម សុខុន ដែលជាប្អូនបង្កើតរបស់លោក កឹម សុខា ត្រូវបានគណបក្សប្រជាជនកម្ពុជា ប្រើប្រាស់សម្រាប់វាយប្រហារលើគណបក្សសង្គ្រោះជាតិ ដែលមានបងបង្កើតរបស់ខ្លួនជាអនុប្រធាន នឹងជាស្ថាបនិកដ៏សំខាន់ម្នាក់ ។ ក្រុមអ្នកវិភាគបានលើកឡើងថា អ្វីដែលលោក កឹម សុខា បាននិយាយ គឺក្នុងន័យសំដៅលើប្អូនប្រុសរបស់ខ្លួនដែលធ្លាប់បានចេញមុខវាយប្រហារលើបក្សសង្គ្រោះជាតិ នាគ្រាកន្លងមក ។

ទោះបីជាលោក កឹម សុខា បានអះអាងអំពីប្រជាប្រិយភាពរបស់បក្សខ្លួនយ៉ាងណាក្តី ប៉ុន្តែលោកក៏បានសម្តែងនូវអារម្មណ៍ក្តុកក្តួល និងពោរពេញដោយភាពភ័យព្រួយចំពោះវត្តមានជនអន្តោប្រវេសន៍ យួនខុសច្បាប់ដែលកំពុងរស់នៅយ៉ាងណែនណាន់តាន់តាប់ និងភ័យយ័នរាយនានាដែលបាននឹងកំពុងកើតឡើងក្នុងសង្គមកម្ពុជា ដូចជាការបណ្តេញប្រជាពលរដ្ឋចេញពីលំនៅដ្ឋាន ដោយគ្មានសំណងសមស្របផ្តល់ដីសម្បទានសេដ្ឋកិច្ចដល់បរទេសចិន-យួន ក្នុងរយៈពេលដ៏យូរដល់៩៩ឆ្នាំ អំពើពុករលួយស៊ីសំណូកសូកប៉ាន់ជាប្រព័ន្ធតុលាការគ្មានឯករាជ្យគ្មានប្រជាធិបតេយ្យពិតប្រាកដ, គ្មាននីតិរដ្ឋ,គ្មានការគោរពសិទ្ធិមនុស្ស ។ល។

ទោះជាមានការអះអាងបែបនេះក្តីបច្ចុប្បន្នគណបក្សសង្គ្រោះជាតិ កំពុងតែប្រឈមនឹងការធ្លាក់ចុះនូវប្រជាប្រិយ៍ភាពខ្លះៗបន្ទាប់ពីមានការធ្វើអត្ថាធិប្បាយរបស់លោក កឹម សុខា ទាក់ទងនឹងរឿងគុកទួលស្លែងនាគ្រាកន្លងមក ។ ទាក់ទងនឹងបញ្ហានេះ សមាគមន៍អ្នករងគ្រោះក្នុងរបបកម្ពុជាប្រជាធិតេយ្យ គ្រោងនឹងដឹកនាំធ្វើបាតុកម្ម



ក្នុងទ្រង់ទ្រាយដ៏ធំមួយប្រឆាំងនឹងលោក កឹម សុខា ក្រោយពេលសមាគមន៍ឈ្មោះ"ក្សេមក្សាន្ត"មួយនេះបានជម្រុញឱ្យលោក កឹម សុខា ធ្វើការសុំទោសជាផ្លូវការចំពោះ វិញ្ញាណក្ខន្ធ័នឹងអតិធាតុអ្នកស្លាប់ក្នុងរបបខ្មែរក្រហម ក្រោយពេលដែលមានខ្សែរអាត់មួយត្រូវបានគេរកឃើញអំពីការធ្វើអត្ថាធិប្បាយរបស់លោក កឹម សុខា ថា "គុកទួលស្លែងជាគុកសិប្បនិម្មិត" ។ សមាគមន៍"ក្សេមក្សាន្ត"នេះ មានលោក ជុំ មី និងលោក ប៊ូ ម៉េង អតីតអ្នកទោសក្នុងគុកទួលស្លែងជាប្រធាន ។ ប៉ុន្តែ លោក ប៊ូ ម៉េង បានច្រានចោលចំពោះគម្រោងធ្វើបាតុកម្មនោះដោយលោកថ្លែងថា





លោកជាមនុស្សអធ្យាក្រឹត្យនឹងមិនចូលរួមធ្វើបាតុកម្មប្រឆាំងនឹងលោក កឹម សុខា ឡើយ ។

ទោះជាបែបនេះក្តីលោក កឹម សុខា តែងតែបកស្រាយដល់អ្នកសារព័ត៌មាននាគ្រាកន្លងមកនេះថា លោកនឹងមិនសុំទោសឡើយ ព្រោះលោកពុំបាននិយាយដូចអ្វីដែលជាការចោទប្រកាន់របស់សមាគមន៍"ក្សេមក្សាន្ត"នោះឡើយ ។

មន្ត្រីនៃគណបក្ស"សង្គ្រោះជាតិ"លោក យឹម សុវណ្ណ ក៏ធ្លាប់បានធ្វើអត្ថាធិប្បាយជុំវិញបញ្ហានេះនាគ្រាកន្លងមកដែរ ។ លោកអះអាងថា នេះគឺជាចេតនានយោបាយដែលប្រឌិតឡើង ដោយគណបក្សកំពុងកាន់អំណាចព្រោះពួកគេមានការភ័យខ្លាចចំពោះប្រជាប្រិយ៍ភាពរបស់គណបក្ស"សង្គ្រោះជាតិ" ។

គួររំលឹកផងដែរថា ក្នុងខណៈដែលអនុប្រធានស្តីទីរបស់គណបក្ស"សង្គ្រោះជាតិ"កំពុងតែមានវត្តមាននៅលើទឹកដីសហរដ្ឋអាមេរិក លោក សម រង្ស៊ី ដែលជាប្រធានបក្សកំពុងតែទទួលបាននូវការស្វាគមន៍ និងគាំទ្រយ៉ាងខ្លាំងពីសំណាក់ក្រុមយុវជនពលករនៅប្រទេស កូរ៉េខាងត្បូង ។ បន្ទាប់ពីបេសកម្មរយៈពេលខ្លីលើទឹកដីអាមេរិក (ថ្ងៃ៣០ខែឧសភា ដល់ថ្ងៃទី៧ខែមិថុនា)លោក កឹម សុខា នឹងបន្តដំណើរទៅកាន់ប្រទេសថៃ ដើម្បីជួបអ្នកគាំទ្រនៅទីនោះ ហើយនៅថ្ងៃទី៧ខែមិថុនា លោកនឹងវិលត្រឡប់ទៅកាន់ប្រទេសកម្ពុជាវិញ ។

ទាក់ទិននឹងបញ្ហានេះនៅមានសំណួរជាច្រើនពីមជ្ឈដ្ឋានមហាជនខ្មែរទាំងក្នុង នឹងក្រៅប្រទេសតែងលើកឡើងថា : តើលោក សម រង្ស៊ី អាចវិលចូលស្រុកដើម្បីត្រៀមខ្លួនធ្វើជានាយករដ្ឋមន្ត្រីដោយគ្មានទោសពៃរ៍ដែរឬទេ ? នេះគឺជាសំណួរដ៏ធ្ងន់ដែលលោក សម រង្ស៊ី ខ្លួនឯងក៏ពិបាកនឹងឆ្លើយ ។

គួរបញ្ជាក់ថា : កម្មវិធី"ពន្លឺព្រះអាទិត្យរះ"នេះត្រូវបានចូលរួមដោយសមាជិក សមាជិការបស់បក្សមកពីបណ្តាលរដ្ឋជាច្រើន ក្នុងសហរដ្ឋអាមេរិក។ ក្រៅពីនោះគេសង្កេតឃើញមានតំណាងអង្គការ សមាគមន៍ជាច្រើនដូចជាតំណាង សហព័ន្ធខ្មែរកម្ពុជាក្រោម,សមាគមន៍ខ្មែរនាទីក្រុងហ្វីឡាដែលហ្វៀ តំណាងក្រុមកុលសម្ព័ន្ធ ម៉ុងតាញ៉ា ។ល។ អ្វីដែលធ្វើឱ្យភ្ញាក់ផ្អើលបំផុតនោះ គឺលោក"កុក ស"តំណាងឱ្យក្រុមកុលសម្ព័ន្ធ"ម៉ុង តាញ៉ា"បានផ្តល់វិភាគទានចំនួន៥០០០ដុល្លា ប្រាំពាន់ដុល្លារ ។ ថវិកាដែលប្រមូលបាននាឱកាសនោះមានចំនួន"១២,៨០៥"(មួយម៉ឺនពីរពាន់ប្រាបីរយប្រាំដុល្លារ) ៕

តមកទំព័រទី ១ កម្មវិធីពិសេសនារដូវក្តៅនាឆ្នាំ២០១៣...

ត្រូវចំណាយ៦៥ដុល្លារក្នុងមួយអាទិត្យ ។

**តម្លៃធម្មតា:** ចាប់ពីម៉ោង៩ព្រឹក ដល់ម៉ោង ៥ល្ងាច តម្លៃ១៥ដុល្លារក្នុងមួយអាទិត្យ ។

ចាប់ពីម៉ោង៧:៣០នាទីព្រឹក ដល់ម៉ោង ៥ល្ងាចតម្លៃ៤០ដុល្លារក្នុងមួយអាទិត្យ ។

ចាប់ពីម៉ោង៧:៣០ នាទីព្រឹក ដល់ម៉ោង ៦ល្ងាច តម្លៃ៦៥ដុល្លារក្នុងមួយអាទិត្យ ។

ក្នុងមួយរដូវក្តៅពេញក្លឹបនេះមានរៀបចំសកម្មភាពជាច្រើនដល់កុមារដូចជាការនាំកុមារទៅសួនដើរលេងការនាំទៅមើលការប្រកួតកីឡា ដូចជា Red Sox Game ការអប់រំ សិល្បៈ ការរាំ ការលេងឧបករណ៍តន្ត្រី ការហាត់ប្រាណ និងសកម្មភាពល្អៗជាច្រើនទៀតដែលបង្កើនប្រាជ្ញាការយល់ដឹង និងការប្រាស្រ័យទាក់ទងជាមួយកុមារៗដទៃទៀត ។ ជាងនេះទៅទៀត កម្មវិធីរដូវក្តៅនេះតម្រូវឱ្យកុមារចូលរួមជារៀងរាល់ថ្ងៃពុធវេលាម៉ោង២រសៀល ដើម្បីទទួលការណែនាំងាយស្រួលចូលរួមកម្មវិធីឱ្យបានស្រុះគ្នា ៕



តមកទំព័រទី ៦ មន្ត្រីថៃ: ការហាមលោក សម រង្ស៊ី...

ឈរឈ្មោះបោះឆ្នោតជាតិក្នុងខែកក្កដា ដោយសារតែមានទោសពីបទញុះញង់ និងបំផ្លាញទ្រព្យសម្បត្តិសាធារណៈនោះ បានមានប្រសាសន៍ថា លោកគ្រោងមកកាន់ក្លឹបអ្នកកាសែតបរទេសនៅក្នុងប្រទេសថៃ ដើម្បីនិយាយអំពីការផ្សព្វផ្សាយសៀវភៅថ្មីរបស់លោក ដែលមានចំណងជើងថា "យើងមិនបង្អាក់ភ្លើងទេ"ការតស៊ូរបស់ខ្ញុំ ដើម្បីលទ្ធិប្រជាធិបតេយ្យនៅក្នុងប្រទេសកម្ពុជា" ។

លោក សម រង្ស៊ី បានមានប្រសាសន៍បន្ថែមទៀតថា "ខ្ញុំគិតថា ការពិតគឺថា ហ៊ុន សែន ភ័យខ្លាចគណបក្សសង្គ្រោះជាតិ ដូច្នេះលោកប្រាកដជាស្នើសុំឱ្យអាជ្ញាធររបស់ប្រទេសថៃរារាំងឱ្យមិនឱ្យចូលជិតប្រទេសកម្ពុជា" ។

ឧត្តមសេនីយ៍ឯក ខៀវ សុភ័គ អ្នកនាំពាក្យក្រសួងមហាផ្ទៃកម្ពុជាបានមានប្រសាសន៍ថា លោកពុំទទួលបានព័ត៌មានអំពីការបដិសេធមិនឱ្យលោក សម រង្ស៊ី ចូលក្នុងប្រទេសថៃនោះទេ ៕

*(រាយការណ៍បន្ថែមដោយ ផន បុប្ផា)*
*ប្រែសម្រួលដោយ ហម សុផាណ្ណា*

## តមកពីទំព័រទី ៧ តួនាទីតំណាងរាស្ត្រ និងប្រាក់ខែ...

ខណៈដែលអ្នកជំនាញច្បាប់មានទស្សនផ្សេងៗពីគ្នាកាលពីម្សិលមិញជុំវិញភាពស្របច្បាប់នៃសេចក្តីសម្រេចនេះអ្នកវិភាគនយោបាយ និងសកម្មជនសិទ្ធិមនុស្សបានលើកឡើងថា ចំណាត់ការនេះមិនមែនជាបញ្ហាផ្លូវច្បាប់ខ្លាំងប៉ុន្មាននោះទេ ព្រោះវាជាគំរូមួយផ្សេងទៀត ដែលបង្ហាញឱ្យឃើញថា គណបក្សប្រជាជនកម្ពុជាប្រើប្រាស់ឥទ្ធិពលនយោបាយរបស់ខ្លួន ដើម្បីបំភិតបំភ័យគណបក្សប្រឆាំង និងកេងយកចំណេញពីដំណើរការច្បាប់ក្នុងប្រទេសកម្ពុជា ។

លោកស្រី ជា វណ្ណាត អ្នកវិភាគនយោបាយឯករាជ្យបានមានប្រសាសន៍ថា "នេះគឺគ្រាន់តែសម្រាប់ការកេងចំណេញផ្នែកនយោបាយប៉ុណ្ណោះ ដើម្បីធ្វើឱ្យគណបក្សប្រឆាំងមានការលំបាក ។ គណបក្សកាន់អំណាចប្រហែលជាមានហេតុផលសមស្របក្នុងការធ្វើដូច្នេះ ប៉ុន្តែវាបង្ហាញឱ្យឃើញថា លទ្ធិប្រជាធិបតេយ្យនៅក្នុងកម្ពុជាមិនទាន់ចាស់ទុំនៅឡើយទេ"។

លោក ធន សារាយ ប្រធានអង្គការសិទ្ធិមនុស្សអាដហុកមានប្រសាសន៍ថា សេចក្តីសម្រេចនេះនឹងរារាំងសមាជិកសភាគណបក្សប្រឆាំងមិនឱ្យទទួលបានអត្ថប្រយោជន៍ពីសិទ្ធិជាតំណាងរាស្ត្ររបស់ពួកគេ និងរិតត្បិតហិរញ្ញវត្ថុរបស់ពួកគេអំឡុងពេលធ្វើយុទ្ធនាការដ៏សំខាន់នេះរយៈពេល១ខែដែលនឹងចាប់ផ្តើមក្នុងរយៈពេល៣សប្តាហ៍ទៀត។

លោកមានប្រសាសន៍ថា "បញ្ហានៅត្រង់ថាពួកគាត់មានអភ័យឯកសិទ្ធិប្រសិនបើគេមិនដកសមាជិកភាពរបស់ពួកគាត់ពីសភាទេនោះ ។ "ជាធម្មតា"ពួកគាត់អាចធ្វើយុទ្ធនាការបានដោយគ្មានការបំពានលើរាងកាយ ឬការចាប់ខ្លួនតាមអំពើចិត្តដោយសារតែពួកគាត់មានអភ័យឯកសិទ្ធិ ហើយប្រសិនបើពួកគាត់មានប្រាក់ "បានពីប្រាក់ខែរបស់ពួកគាត់"ក៏ពួកគាត់អាចធ្វើយុទ្ធនាការបានដែរ "។

លោក ឡៅ ម៉ុងហៃ អ្នកវិភាគនយោបាយឯករាជ្យមានប្រសាសន៍ថា សេចក្តីសម្រេចនេះក៏ធ្វើឱ្យមិនស្របច្បាប់ដល់ច្បាប់ចម្រូងចម្រាសមួយស្តីពីការដាក់ទោសព្រហ្មទណ្ឌចំពោះការបដិសេធមិនទទួលស្គាល់អំពើឃោឃៅរបស់ខ្មែរក្រហមដែលគ្រោងនឹងលើកយកទៅពិភាក្សាដេញដោលនៅក្នុងរដ្ឋសភា នៅថ្ងៃសុក្រនេះផងដែរ ។

លោកបន្តថា "សេចក្តីសម្រេចនេះប៉ះពាល់ដល់ភាពស្របច្បាប់នៃច្បាប់ដែលប្រហែលជាត្រូវអនុម័តអំឡុងពេលនេះ ឧទាហរណ៍ ដូចជាច្បាប់ស្តីពីការបដិសេធមិនទទួលស្គាល់អំពើប្រល័យពូជសាសន៍ជាដើម ។ ប្រសិនបើត្រូវបានអនុម័តដោយគ្មានការចូលរួមពីសមាជិកសភាទាំងនោះទេ អាចនិយាយបានថា ច្បាប់នោះមិនសូវមានភាពស្របច្បាប់ឡើយ"។

ច្បាប់របស់កម្ពុជាស្តីពីការបោះឆ្នោតជ្រើសរើសសមាជិកសភាចែងថា "បេក្ខជនដែលលាលែងពីគណបក្សរបស់ខ្លួននឹងបាត់បង់សមាជិកភាពរបស់ខ្លួននៅក្នុងសភាដោយស្វ័យប្រវត្តិ" ប៉ុន្តែចែងថា ប្រសិនបើការលាឈប់នោះធ្វើលើសពីប្រាំមួយខែមុនពេលបោះឆ្នោតគណបក្សនោះអាចជ្រើសរើសតំណាងរាស្ត្រជំនួស ។

លោក សុក សំអឿន ជាមេធាវីមួយរូប និងជាប្រធានក្រុមអ្នកច្បាប់ការពារសិទ្ធិកម្ពុជា ជាអង្គការជំនួយផ្នែកច្បាប់មានប្រសាសន៍ថា ប្រសិនបើពេលនេះតំណាងរាស្ត្រគណបក្ស សម រង្ស៊ី និងតំណាងរាស្ត្រគណបក្សសិទ្ធិមនុស្សបានចុះឈ្មោះចូលរួមជាមួយគណបក្សសង្គ្រោះជាតិ ហើយនោះមានន័យថា ពួកគាត់បានចាកចេញពីគណបក្សដើមរបស់ខ្លួនហើយ ។ ប្រសិនបើមានអ្នកផ្សេងត្រូវចូលជំនួសកន្លែងរបស់ពួកគាត់ចាំបាច់ត្រូវធ្វើឡើងលើសពីប្រាំមួយខែមុនការបោះឆ្នោត ។

លោកថ្លែងថា "ដូច្នេះរដ្ឋាភិបាល និងសមាជិកគណបក្សប្រជាជនកម្ពុជាអាចតវ៉ាអំពីរឿងនោះ និងអាចគ្រប់គ្រងប្រាក់ខែរបស់ពួកគាត់បាន"។

លោក គល់ បញ្ញា នាយកប្រតិបត្តិគណៈកម្មាធិការសម្រាប់ការបោះឆ្នោតដោយសេរី និងយុត្តិធម៌នៅកម្ពុជាហៅកាត់ថា "ខុមហ្វ្រែល" បានទទួលស្គាល់ថា ភាពស្របច្បាប់នៃសេចក្តីសម្រេចនេះមិនច្បាស់លាស់ទេ ប៉ុន្តែបានមានប្រសាសន៍ថា "ខ្លឹមសារច្បាប់" អនុញ្ញាតឱ្យសមាជិកសភាផ្លាស់ប្តូរគណបក្សដោយមិនប្រឈម និងការបាត់បង់អាសនៈនៅក្នុងគណបក្សចាស់របស់ខ្លួននៅរដ្ឋសភាឡើយ"។

លោកបានមានប្រសាសន៍ថា "គណបក្សប្រជាជនកម្ពុជាអាចធ្វើអ្វីៗសព្វបែបយ៉ាង ដើម្បីអត្ថប្រយោជន៍របស់ខ្លួន ។ អំឡុងពេលបោះឆ្នោតពួកគេព្យាយាមធ្វើឱ្យសមាជិកគណបក្សប្រឆាំងប្រឈមនឹងបញ្ហា"៕

*ប្រែសម្រួលដោយ តែម សុខុម*

# វិស្វកម្មក្នុងចិត្តមនុស្ស
## The human inner engineering


និពន្ធដោយ : ម៉ៅ ច័ន្ទសំណុំ

មនុស្ស និងសត្វមានចំណុចរួមគ្នា និងខុសប្លែកពីគ្នា ។ សត្វចាបចេះកាច់សំបុកយ៉ាងល្អឥតខ្ចោះសំរាប់រស់នៅ និងថែរក្សាកូនវា ។ សត្វស្លាបចេះហោះហើរកាត់ទ្វីបទៅរកចំណីទីឆ្ងាយៗ សំរួលតាមអាកាសធាតុតំបន់ពួកគេហើរលើអាកាសដ៏ល្អល្ហេវពុំវង្វេងឡើយ ។ ការប៉ិនប្រសប់របស់សត្វនេះ ស្ថិតនៅក្រោមឥទ្ធិពលនៃសភាគតិប៉ុណ្ណោះ ពួកគេពុំអាចធ្វើអភិវឌ្ឍន៍ ឬកែច្នៃរបៀបរបបទាំងនោះឡើយ ។

មនុស្សយើងជាសត្វលោកមានប្រាជ្ញាខ្ពស់បំផុត គេមានសមត្ថភាពរុករកផលិតផលឧបករណ៍សម្ភារៈនានាបំរើជីវភាព ហើយគេមានសមត្ថភាពអាចកែច្នៃឱ្យរបស់ទាំងនោះ កាន់តែទំនើបឡើងៗ ។ មនុស្សផលិតរថយន្ត យន្តហោះ សំណង់ធំៗ ហើយឥឡូវនេះសម័យឌីជីធុលសម្ភារៈប្រណិតអស្ចារ្យផុសឡើង ដូចជា កុំព្យូទ័រ ប្រព័ន្ធអាំងទែណែត អាយហ្វូន អាយ ផាត អាប៉ោត ។ល។ វិទ្យាសាស្ត្របច្ចេកទេសវិស្វកម្មទំនើបកំពុងតែអភិវឌ្ឍន៍លឿនដ៏ក្រៃលែង ។

គួរកត់សម្គាល់ថា វិទ្យាសាស្ត្របច្ចេកទេសវិស្វកម្មដែលខ្ញុំរៀបរាប់ខាងលើនេះ បាញ់មុខព្រួញសំដៅទៅរកការកែច្នៃរបស់សម្ភារៈខាងក្រៅរបស់ខ្លួនប៉ុណ្ណោះ ។ ចំណែកមនុស្សខ្លួនឯងពុំទាន់បានសំរួលច្នៃប្រឌិតវិស្វកម្មនៅឡើយ ។ មនុស្សបានទុកឱ្យជីវិតពិភពផ្លូវចិត្តផ្ទៃក្នុងខ្លួននៅជាព្រៃហោដ្ឋានប្រៀបដូចជាត្បូងស្ថិតក្នុងថ្មភ្នំពុំទាន់កែច្នៃប្រៀបដូចជាលោហៈធាតុនានាស្ថិតនៅជារ៉ែក្នុងភ្នំ ឬក្នុងដីនៅឡើយ ។ គឺអាស្រ័យដោយខ្វះចន្លោះដូចនេះហើយ ទើបគេពិនិត្យឃើញបាតុភូតអវិជ្ជមាននានា ក្នុងសង្គមមនុស្សផុសឡើងជាបន្តបន្ទាប់ :

-មនុស្សនៅតែកើតទុក្ខភ័យព្រួយបារម្ភស្ត្រេះ ទោះបីខ្លួនគេរស់នៅលើគំនរទ្រព្យសម្បត្តិមហាសាលក៏ដោយ រស់នៅក្នុងកិត្តិយសអំណាចដ៏ឧត្តុង្គឧត្តមក៏ដោយ ឬមានចំណេះវិជ្ជាខ្ពស់ផុតលេខក៏ដោយ ពន្លឺសុភមង្គលហាក់នៅឆ្ងាយពីគេជានិច្ច ។

-សង្គ្រាមក្នុងលោកកើតមាន និងបន្ទុះភ្នំភ្លើងពុំអាចពន្លត់បាន ។

-អត្តឃាតកម្ម ការរំលោភ ការលក់ដូរមនុស្សដូចសត្វធាតុ ការកាប់សំលាប់កើតមានគ្រប់កន្លែង ។

-គុណភាពនៃចិត្តមនុស្សជាតួទៅកករល្អកជោគជាំដោយកំហឹងឆេវឆាវ ទុក្ខព្រួយគំនុំ ច្រណែនប្រច័ណ្ឌ លោភលន់ គិតតែប្រយោជន៏ផ្ទាល់ខ្លួន ។ល។

តើអ្នកជ្រាប ឬទេ? មកដល់សម័យ ឌីជីកុលសព្វថ្ងៃនេះ គេសង្កេតឃើញលេចឡើងនូវមនុស្សពីរប្រភេទ : មនុស្សបូរាណ និងមនុស្សទំនើប ។

**-មនុស្សបូរាណ :** ពុំទាន់សម័យដែលមានជំនឿថា លុយកាក់ ទ្រព្យសម្បត្តិ កិត្តិយស អំណាច ចំណេះវិជ្ជា គឺជាប្រភពតែមួយគត់នៃសុភមង្គលមនុស្សលើភពផែនដីនេះពួកគេមាន កម្មវត្ថុសំរួចកម្លាំង ប្រឹងប្រែង ស្វែងរកវត្ថុ សម្ភារៈក្រៅខ្លួនចំបង ។ ជីវិតគេឆ្លងកាត់ភាពខ្លោចផ្សារទុក្ខសោកចំរុងចំរះរាប់ពុំអស់ ។

**-មនុស្សទំនើប :** ពួកគេមានទិសដៅពីរចំណុច : ទី១ ស្វែងរកសុភមង្គលសេចក្តីសុខក្សេមក្សាន្តក្នុងសម្ភារៈ និងវត្ថុក្រៅខ្លួន ដូចករណីជំពូកមនុស្សបូរាណដែរ ទី២ គេធ្វើការអភិវឌ្ឍន៍កែច្នៃវិស្វកម្មពិភពផ្លូវចិត្តក្នុងខ្លួនគេថែមទៀត ។ ជំពូកមនុស្សចុងក្រោយនេះហើយ គេរកឃើញតុល្យភាព អត្ថន័យដ៏ត្រចេះត្រចង់របស់ជីវិត សេរីភាពប្រាជ្ញាភ្លឺថ្លា សន្តិភាព សុភមង្គល ពិតប្រាកដលើភពផែនដីយើងនេះ ។ មនុស្សទំនើបនេះគេខិតខំបញ្ចូលបច្ចេកទេស វិស្វកម្មវិធីនានារបៀបនានាទៅក្នុងខ្លួន សំដៅទន្ទ្រាន កាប់ឆ្ការព្រៃហោរដ្ឋានក្នុងចិត្តនេះសំដៅធ្វើការច្នៃត្បូងដែលមានស្រាប់ក្នុងខ្លួននេះ បង្កើតសមត្ថភាពគ្រប់គ្រងពិភពចិត្តទាំងមូលមាន ដូចជាពិនិត្យគ្រប់គ្រងសំបូរគំនិតអារម្មណ៍ មនោសញ្ចេតនា ម៉េម៉ូរី កំហិត ស្ត្រេះភ័យព្រួយ Subcounciousness ។ល។ តាមរបៀបនេះ ពួកគេបង្កើតម៉ាស៊ីនផលិតរស់ជាតិជីវិតសេចក្តីសុខសាន្ត សប្បាយរីករាយ និងសុភមង្គល ។ ពួកគេមានសិទ្ធសេរីភាពអាចជ្រើសរើសរូបភាពជីវិតណាមួយដែលរដ្ឋអំណាចបញ្ចេញពីក្នុងខ្លួនមក" កិច្ចការដែលខ្ញុំរៀបរាប់មកនេះ គេហៅថា "វិស្វកម្មក្នុងចិត្តមនុស្ស" The Human Inner engineering ។ ប្រព័ន្ធអ៊ីនទែណែតបានបំផុសឱ្យមនុស្សគ្រប់ទ្វីបកាន់តែភ្ញាក់រលឹក និងមើលឃើញភាពចាំបាច់នៃវិស្វកម្មក្នុងចិត្តមនុស្សនេះ ។ ឥឡូវនេះវិជ្ជាបន្ទូរលំហែកាយចិត្តវិជ្ជាសមាធិ តាមបែបព្រះពុទ្ធសាសនា ព្រហ្មញ្ញសាសនា តៃជី ហ្សិន កំពុងតែផុលផុះលាតសន្ធឹងហួសផុតពីក្របខណ្ឌសាសនាហើយបានចូលទៅក្នុងប្រតិបត្តិទូលំទូលាយ

**តទៅទំព័រទី១៦**

## តមកពីទំព័រទី ១៥ វិស្វកម្មក្នុងចិត្តមនុស្ស

ក្នុងគ្រប់ស្រទាប់សង្គមមនុស្សទំនើបជីវភាពប្រចាំថ្ងៃតែម្តង។

ក្នុងអត្ថបទស្តីអំពីវិស្វកម្មក្នុងចិត្តមនុស្សនេះ ខ្ញុំនឹងជំរាបជូនអំពីសតិដឹងរបស់មនុស្ស Human awarers ដែលជារតនៈសម្បត្តិដ៏ថ្លៃថ្លា ជាកូនសោរជាឧបករណ៍ពិសេសគ្មានពីរសំរាប់ឱ្យមនុស្សយើងម្នាក់ៗអាចមានសមត្ថភាពចូលទៅគ្រប់គ្រងផ្ទៃចិត្តរបស់ខ្លួនបាន។ សតិដឹងរបស់មនុស្សជាដួងកែវ ជាកំណប់ដ៏មហិមារបស់មនុស្សយើងគ្រប់រូប។ យើងអាចប្រៀបធៀបសតិដឹងនេះទៅនិងចង្កៀងទិព្វ ក្នុងរឿងអាឡាដាំង ចង្កៀងទិព្វក្នុងចង្កៀងទិព្វនេះបានលាក់ទុកក្នុងល្អាងភ្នំដ៏ជ្រៅលុះរបស់ពិសិដ្ឋនេះធ្លាក់ដល់ដៃមនុស្សណាហើយគេនឹងក្លាយទៅជាម្ចាស់អ្វីៗទាំងអស់លើផែនដីនេះ គេមានមហិទ្ធិរិទ្ធមានសេរីភាពអាចជ្រើសរើស និងបង្កើតអ្វីៗតាមចំណូលចិត្ត។ ប៉ុន្តែសតិដឹងរបស់មនុស្សខុសប្លែកពីចង្កៀងទិព្វត្រង់របស់នេះឋិតនៅរូបកាយមនុស្សតែម្តង ហើយវាវត្តមាននៅពេលនេះតែម្តង ប៉ុន្តែមនុស្សទូទៅពុំដឹងពុំយល់។ សតិដឹងនេះកើតឡើងព្រមគ្នាជាមួយនឹងរូបកាយមនុស្ស ខួរក្បាល ភ្នែក ច្រមុះ អណ្តាតត្រចៀក ស្បែក សំរាប់មនុស្សប្រើប្រាស់ដឹកនាំជីវិត នឹងក្រេបជញ្ជក់រស់ជាតិនៃជីវិតផង។ សតិដឹងខ្លួនមនុស្សនេះឋិតនៅជាអាថ៌កំបាំងដែលអ្នកគួររុករកឱ្យឃើញ ហើយយកមកប្រើប្រាស់ធ្វើជីវិតមានន័យមានខ្លឹមសាររួចផុតទុក្ខសោកសព្វបែបយ៉ាងក្នុងជីវិត។

**ពាក្យបុរាណពោលទុកមកថា:** កម្រនឹងបានកើតមកជាមនុស្សណាស់ កើតជាមនុស្សហើយកម្រក្លាយជាមនុស្សពិតប្រាកដណាស់។ តើអ្នកជ្រាប ឬទេ? តើមនុស្សពិតប្រាកដនោះមានលក្ខណៈសម្បត្តិដូចម្តេច ? ជនណាដែលព្យាយាមស្តាប់អត្ថបទ "វិស្វកម្មក្នុងចិត្តមនុស្ស" នេះដឹងមាន **ភ័ព្វសំណាង** រកឃើញចម្លើយអត្ថន័យនៃជីវិតមនុស្សយ៉ាងពិត ប្រាកដ (The meaning of human life) នេះជាការបកស្រាយទស្សនៈពិភពផ្លូវចិត្តតាមទស្សនៈមនុស្សទំនើប មនុស្សសម័យឌីជីថល ។ អត្ថបទនេះបែបនេះ ពុំទាន់មានក្នុងអក្សរសាស្ត្រខ្មែរឡើយ។

ក្នុងអតបទនេះខ្ញុំនឹងរៀបរាប់អំពីដើមកំណើតនៃជីវិត និងសតិដឹងការវិវត្តន៍ទៅនៃសតិដឹងមនុស្សផលប្រយោជន៍នៃសតិដឹងវិធីប្រតិបត្តិជាក់ស្តែងធ្វើយ៉ាងណាឱ្យអ្នករកឃើញសតិដឹងក្នុងខ្លួននេះ និងការប្រើប្រាស់សតិដឹងក្នុងជីវិតប្រចាំថ្ងៃ។ ឯកសារនេះដឹងបានទៅជាឧបករណ៍ជួយដល់មនុស្សគ្រប់ស្រទាប់សង្គម។

ចំពោះជនសារមញ្ញទូទៅ បើគេព្យាយាមចំណាយពេលបន្តិបន្តួចស្តាប់ដោយយកចិត្តទុកដាក់ គេនឹងទទួលបានចំណេះដឹងមួយដ៏ថ្លៃថ្លា សំរាប់បំភ្លឺផ្លូវជីវិតទៅខាងមុខ គេនឹងរកឃើញអត្ថន័យនិងវិថីជីវិតដ៏ភ្លឺស្វាង។

ចំពោះសិស្សនិងអ្នកប្រើប្រាស់ខួរក្បាលគេអាចនឹងបង្កើតគុណភាពការងារបានមួយកំរិតខ្ពស់អាស្រ័យដោយគេបានទទួលវិធីបន្ធូរលំហែកាយចិត្ត និងសំរាកខួរក្បាលគ្រប់ពេលវេលាដែលគេត្រូវការ។

ចំពោះជនដែលកំពុងតែត្រាំ និងជាប់កុនក្នុងវិបត្តផ្លូវចិត្ត រកដឹង រកឃើញ វិធីនានាសំរាប់រំដោះខ្លួនឱ្យចេញផុតពីភាពខ្មៅងងឹតទុក្ខសោក និងរកឃើញពន្លឺសំរាប់ជីវិតគេឡើងវិញ។

ដោយឡែកចំពោះអ្នកដែលចាប់ផ្តើមហាត់សមាធិ អត្ថបទនេះនឹងទៅជាធំមួយដល់គេពិតប្រាកដ។ ហើយបើអ្នកជាអ្នកសមាធិយូរលង់មកនោះ អត្ថបទនេះនឹងក្លាយទៅជារង្វាន់រង្វាស់សំរាប់ពិនិត្យភាពត្រឹមត្រូវ និងជំរុញឱ្យការហាត់សមាធិកាន់តែសុក្រិតឡើង។

**អត្ថបទនេះចែកចេញជា ៤ ភាគ :**

- **ភាគទី១**, ការវិវត្តន៍នៃជីវិត និងសតិដឹងមនុស្សលើភពផែនដីនេះ និងលក្ខណៈមនុស្សបុរាណ។
- **ភាគទី២**, លក្ខណៈរីកចំរើនរបស់មនុស្សទំនើប ឬអ្នកត្រាស់ដឹង។
- **ភាគទី៣**, អ្នកត្រាស់ដឹងជាន់ខ្ពស់ និងទិសដៅកសាងខ្លួន មនុស្សយើងគ្រប់ៗគ្នា។
- **ភាគទី៤**, ការប្រតិបត្តិឆ្ពោះទៅបំផុស និងប្រើប្រាស់សតិដឹងឱ្យទូលំទូលាយក្នុងជីវភាពប្រចាំថ្ងៃ។

**ភាគទី១ ការវិវត្តន៍ និងសតិដឹងលើភពផែ ដី និងលក្ខណៈមនស្សបុរាណ**

កាលពីកុមារភាពខ្ញុំធ្លាប់ឮសំនួរមួយថា: តើមនុស្សកើតមកពីណាមក? ចំលើយ មកពីម៉ែ និងឪពុក។ ចុះម៉ែ និងឪពុកកើតមកពីណាដែរ ? មកពីតា និងយាយ។ ចុះតា និងយាយកើតមកពីណាដែរ ? មកពីតាតួត យាយតួត ។ល។...សំនួរ និងចំលើយចេះតែបន្តពុំមានទីបញ្ចប់។

មនុស្សជាច្រើនជំនាន់បានស្រាវជ្រាវរុករកឫសកែវកំណើតរបសខ្ញុំខ្លួន តើមនុស្សកើតចេញមកពីណា ? តើជីវិតនេះវិវត្តិន៍ដំបូងមកដូម្តេចហើយទៅអនាគតទៅជាយ៉ាងណាដែរ? **តើខ្លឹមសារនិងអត្ថន័យនៃជីវិតរបស់មនុស្សនៅកន្លែងណា ?**

ឯសារ សាសនា និងវិទ្យាសាស្ត្របានបង្ហាញថា រាប់លានកោតឆ្នាំមុនជីវិតពុំទាន់មាននៅឡើយនៅលើលោកយើងនេះ។ ជីវិតលេចរូបរាងជាកោសិកាទោល បន្ទាប់មកវាបានបំបែកខ្លួនជាពហុកោសិកា ដែលបានក្លាយទៅជាមូលដ្ឋានបង្កបង្កើតជារុក្ខជាតិ និងសត្វជីវិតនានាលើផែនដីយើងនេះ។ ឯកាសារវិទ្យាសាស្ត្រខ្លះបានបញ្ជាក់ថា ជីវិតសត្វដំបូងជាសត្វត្រីវាវិវត្តន៍ឡើងមករស់នៅលើគោកធ្លាក់ស្រការ ដុះជើងដុះស្លាបក្លាយទៅជាសត្វជើងបួន សត្វជើងពីរ សត្វស្លាប ដំរី ខ្លា ស្វា មនុស្សព្រៃមនុស្សបុរាណ មនុស្សទំនើបយើងនេះ។ ធម្មជាតិចេះតែវិវត្តិន៍ទៅមុខកាន់តែល្អឡើងៗខ្ពស់ឡើងៗសុក្រិតឡើងៗ។ សត្វ និងរុក្ខជាតិដែលរីកលូតលាស់ពុំទាន់សម័យ និងគេត្រូវបានរលាយបាត់បង់ផុតពូជពីផែនដីនេះ ហើយទម្ទឹមនឹងនេះ សត្វនិងមនុស្សទំនើបផុសកើតឡើងជាបន្តបន្ទាប់។

ប្រវត្តិជីវិតបានបង្ហាញថា ពូជសត្វ ដៃណូស័របានវិនាសបាត់ផុតពូជពីផែនដីយើងហើយ។ ការវិវត្តិន៍ខាងលើនេះ ប្រព្រឹត្តទៅក្នុងរយៈពេលវែងរាបកោតឆ្នាំ ៕ **នៅមានត**



ជោគជតាប្រចាំសប្តាហ៍

# ជោគជតារាសីទាំង 12 ប្រចាំឆ្នាំហោង

**ឆ្នាំជូត**

រាល់ការបំពេញការងាររបស់លោកអ្នកក្នុងរយៈពេលនេះ សុទ្ធតែផ្តល់នូវអត្ថប្រយោជន៍គួរឱ្យជាទីពេញចិត្តទាំងអស់គ្មានអ្វីមករាំងស្ទះឡើយ ហើយជាងនេះទៀត នោះគម្រោងការដែលបានត្រៀមទុកជាយូរមក ហើយក៏នឹងបានសម្រេចផងដែរ ។ បើជាអាជីវកររកស៊ីវិញ មានការរីកចម្រើនល្អលាស់ទៅមុខជាលំដាប់ ។ រីឯបញ្ហាគូស្នេហ៍ច្រើនយល់ចិត្តគ្នា និងនឹករលឹកគ្នាបើនៅឆ្ងាយ ៕

**ឆ្នាំថោះ**

លោកអ្នកនឹងទទួលបាននូវលាភសក្ការៈពីភាគហ៊ុនរកស៊ី និងមិត្តរួមការងារយ៉ាងច្រើនគួរឱ្យពេញចិត្ត ។ លើសពីនេះទៅទៀតគម្រោងការដែលបានត្រៀមទុកនឹងបានសម្រេចដូចបំណងទៀតផង ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ គួរជួញដូរនៅទីជិតៗ ទើបសមប្រកប ។ រីឯបញ្ហាស្នេហាគូស្នេហ៍ចេះស្តាប់ឱវាទគ្នា ៕

**ឆ្នាំមមី**

រាល់ការស្អប់ស្អាញដែលធ្លាប់កើតមានលើលោកអ្នកក្នុងពេលនេះ នឹងត្រូវអហោសិកម្មទាំងអស់ ហើយទ្រព្យដែលរបូតចេញពីដៃទៅនឹងវិលត្រឡប់មកវិញយ៉ាងគ្រប់គ្រាន់ ។ ចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ ត្រូវគិតគូរឱ្យបានច្បាស់លាស់មុននឹងដាក់ទុនថ្មី ទើបមិនខាតបង់រាល់ការចំណាយទាំងនោះ ។ រីឯបញ្ហាស្នេហាត្រូវចេះពូនជ្រោយចំណងស្នេហាដោយមានភាពផ្អែមល្ហែម ទើបជាការប្រសើរ ៕

**ឆ្នាំរកា**

នៅក្នុងរយៈពេលនេះ លោកអ្នកទទួលលាភសក្ការៈពីសាច់ញាតិបងប្អូនដែលជិតស្និទ្ធ ។ ក្រៅពីនោះក៏នៅទទួលបានដំណឹងល្អដែលមានប្រយោជន៍ដល់ជាតិនិងការងាររបស់លោកអ្នកតទៅអនាគតទៀតផង ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញផលកម្រៃទទួលបានកាក់កបគ្រាន់បើ តែហាមកុំជួញដូរផ្លូវឆ្ងាញប្រយ័ត្នមានបញ្ហាដល់ខ្លួន ។ រីឯបញ្ហាស្នេហាគូស្នេហ៍អាចមានការរកាំរកូសគ្នាខ្លះ ប៉ុន្តែមិនធ្ងន់ធ្ងរនោះទេ ៕

**ឆ្នាំឆ្លូវ**

រាល់ការបំពេញការងារទាំងឡាយលោកអ្នកមិនមានបញ្ហាអ្វីចោទនោះទេ ប៉ុន្តែក្នុងនោះសូមប្រយ័ត្នកុំយកអាសាមនុស្សសម្បុរសឱ្យសោះ ព្រោះនាំឱ្យកើតរឿងសៅហ្មងទៅថ្ងៃក្រោយ ។ សម្រាប់អ្នកប្រកបមុខរបររកស៊ីជួញដូរវិញ អាចសន្សំទុកបានខ្លះ ។ រីឯបញ្ហាស្នេហាចូរកុំយកភាពមានះចង់ចាញ់ឈ្នះប្រយ័ត្នកើតមានជម្លោះវិវាទឈានដល់ការប្រេះស្រាំ ៕

**ឆ្នាំរោង**

រាល់កិច្ចការសព្វបែបយ៉ាងលោកអ្នកអាចជួបនឹងបញ្ហាខ្លះៗនាគ្រាដំបូង ប៉ុន្តែក្រោយមកមិនមានអ្វីជាឧបសគ្គរារាំងទៀតឡើយ ។ ចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ មានការទិញចូលលក់ចេញគ្រាន់ បើអាចរកផលកម្រៃត្រឡប់មកផ្ទះវិញយ៉ាងត្រជាក់ចិត្ត ។ រីឯបញ្ហាស្នេហាមានភាពផ្អែមល្ហែម និងស្រស់ស្រាយប្រៀបដូចត្រីក្នុងទឹកនារដូវខែវស្សាដូច្នេះដែរ ៕

**ឆ្នាំមមែ**

រាល់កិច្ចការដែលលោកអ្នកប៉ងប្រាថ្នាជាយូរមកហើយនោះក្នុងរយៈពេលនេះ គឺបានសមដូចបំណង ហើយគ្មានអ្វីមករារាំងនោះទេ ហើយរាល់ការប៉ងឃាយីពីមនុស្សដែលមានបំណងមិនល្អមកលើលោកអ្នកនោះក៏មិនបានសម្រេចដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញអាចពង្រីកអាជីវកម្មឱ្យធំបន្ថែមទៀតបាន ។ ឯបញ្ហាស្នេហា គូស្វាមីភរិយាមានភាពសុខដុមរមនាគ្មានផលរមាស់អ្វីឡើយ ៕

**ឆ្នាំច**

អាចពោលបានថា លោកអ្នកមានសេចក្តីសុខក្នុងជីវិត និងការងារ ព្រោះវិបត្តិ និងភាពស្មុគស្មាញដែលមានកន្លងមកក៏បានធូរស្រាលឡើងវិញមួយកម្រិតផងដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ ទោះបីជាចេញទៅជួញដូរនៅទីណាក៏គួរចៀសវាងការដាក់ទុនថ្មី ព្រោះអាចនាំឱ្យខាតបង់ ។ រីឯបញ្ហាស្នេហាគូស្នេហ៍ច្រើនប្រចណ្ឌខុសរឿង ៕

**ឆ្នាំខាល**

លោកអ្នកគួរប្រុងប្រយ័ត្នចំពោះការនិយាយស្តីបន្តិច ពីព្រោះអាចនឹងមានគូសត្រូវចាំចាប់ទោសកំហុសមូលបង្កាច់បង្ខូចកេរ្តិ៍ឈ្មោះរបស់លោកអ្នកឱ្យប្រែក្លាយទៅជាស្អុយអសោចិ៍ ។ សម្រាប់អ្នកប្រកបមុខរបររកស៊ីជួញដូរវិញមានក្រុមមនុស្សតាមឈ្នានីសច្រើន ដូច្នេះត្រូវប្រយ័ត្នបន្តិចចៀសវាងការបរាជ័យ ។ រីឯបញ្ហាស្នេហាមានភាពចម្រូងចម្រាសដាក់គ្នាបន្តិចបន្តួច ៕

**ឆ្នាំម្សាញ់**

លោកអ្នកមានភ័ព្វសំណាងល្អក្នុងការងារទទួលរឿងឡើងតួនាទី ឬប្រាក់បៀវត្សរ៍បន្ថែម ។ ជាងនេះទៀតនោះ ប្រសិនបើចង់ពឹងពាក់អ្នកមានយសស័ក្តិខ្ពង់ខ្ពស់ក្នុងរឿងអ្វីមួយនឹងបានដូចបំណងផងដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញអាចរកប្រាក់ចំណូលចិញ្ចឹមគ្រួសារបានដោយស្រួលទេ មិនមានអ្វីមករាំងស្ទះឡើយ ។ រីឯបញ្ហាស្នេហាគូស្នេហ៍រមែងចេះអត់ឱនឱ្យគ្នា ៕

**ឆ្នាំវក**

ក្នុងរយៈពេលនេះលោកអ្នកជួបនឹងបញ្ហាខាងផ្លូវចិត្តមិនសូវជាសប្បាយរីករាយប៉ុន្មាននោះទេ តែប្រសិនបើចង់ទទួលផលពីការងារនោះ ចូរធ្វើចិត្តឱ្យត្រជាក់ ទើបបានសម្រេចដូចបំណង ។ បើជាអ្នកប្រកបរបររកស៊ីជួញដូរវិញ គឺមានការប្រទាំងប្រទើសជាមួយអ្នកមានមុខរបរដូចគ្នា ដូច្នេះគួរបើកចិត្តឱ្យទូលាយ ។ រីឯបញ្ហាស្នេហាមានការកាំចិត្ត ព្រោះតែម្នាក់ៗចង់ចាញ់ឈ្នះគ្នានោះឯង ៕

**ឆ្នាំកុរ**

លោកអ្នកអាចនឹងមានអារម្មណ៍ច្របូកច្របល់បន្តិចនៅក្នុងរយៈពេលនេះ ព្រោះកិច្ចការដែលថា នឹងទទួលបានផលល្អនោះ វាអាចមានការប្រែប្រួលដោយសារតែមានការរំខានពីអ្នកដទៃ ។ បើចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ អាចរកផលកម្រៃគ្រាន់បើគួរជាទីគាប់ប្រសើរជាងមុន ។ រីឯបញ្ហាស្នេហាពុំមានផលរមាស់អ្វីនោះឡើយ ៕

តមកពីទំព័រទី ៤ ១៨ មិនា ១៩៦៩ ជាដើមចមនៃវិបត្តិសុខភាព...

នាំគ្នារត់ចូលជួរទ័ពជាមួយខ្មែរក្រហម។ វាក៏បានផ្តល់លេសមួយឱ្យចលនាខ្មែរក្រហមទាក់ទាញយុវជនឱ្យចូលរួមក្នុងចលនាឧទ្ទាមរបស់ខ្លួន។ គ្រួសារភាគច្រើននៅសល់តែមនុស្សចាស់ដែលនៅផ្ទះ រីឯក្មេងៗបានត្រូវអូសទាញដោយពួកខ្មែរក្រហមឱ្យចូលរួមជាមួយចលនារបស់ខ្លួនប្រឆាំងជាមួយរដ្ឋាភិបាលលោកសេនាប្រមុខ លន់ នុល ដែលគាំទ្រដោយអាមេរិក។

សង្គ្រាមវៀតណាមបានត្រូវបញ្ចប់ខ្មែរក្រហមបានទទួលជ័យជំនះជាស្ថាពរនៅថ្ងៃទី១៧ ខែ មេសា ឆ្នាំ១៩៧៥ លើរបបសាធារណរដ្ឋខ្មែរ ហើយចាប់ផ្តើមអនុវត្តមនោគមន៍វិជ្ជាជ្រុលនិយមរបស់ខ្លួន ដោយលុបបំបាត់ចោលទាំងអស់នូវរចនាសម្ព័ន្ធសេដ្ឋកិច្ចនិងសង្គមកិច្ចដែលនៅសេសសល់ពីការទម្លាក់គ្រាប់បែក។ ពួកខ្មែរក្រហមជម្លៀសប្រជាជនចេញពីទីក្រុងនិងទីប្រជុំជននានាទៅកាន់តំបន់ជនបទ ដើម្បីចូលរួមអនុវត្តគោលនយោបាយកសិកម្មមហាលោតផ្លោះមហាអស្ចារ្យរបស់ខ្លួន។ ការបង្ខំឱ្យធ្វើពលកម្មបាក់កម្លាំងការសម្លាប់ចោលអ្នកដែលជំទាស់ និងគោលនយោបាយរបស់ខ្លួនការសម្លាប់រង្គាលបញ្ញវ័ន្ត វិស្វករ សាស្ត្រាចារ្យ និងអ្នកដែលពាក់វ៉ែនតា ព្រមទាំងអតីតយុទ្ធជនរបស់របប លន់ នុល គឺជាផ្នែកមួយនៃយុទ្ធសាស្ត្រឆ្ពោះទៅសំរេចនយោបាយមហាលោតផ្លោះរបស់ពួកខ្មែរក្រហម។ ជាផលវិបាកមានមនុស្សប្រហែល ២.២ លាននាក់បានស្លាប់ និងត្រូវបានសម្លាប់ រាប់លាននាក់ទៀតកមានជំងឺរ៉ាំរ៉ៃបាក់ស្បាតផ្លូវចិត្ត បានបន្សល់ទុកកុមារកំព្រារាប់សែននាក់ និងជាង ៩០% នៃអ្នកចេះដឹងរួមមាន និស្សិត បញ្ញវ័ន វិស្វករ សិល្បៈករ ពាណិជ្ជករ វេជ្ជបណ្ឌិត និងបណ្ឌិតត្រូវបានកំទេចចោល បន្ទាប់ពីការការកាន់អំណាចរបស់ពួកនេះអស់រយៈពេលជិត៤ឆ្នាំ។

របបខ្មែរក្រហមត្រូវដេញចេញពីអំណាចដោយរណៈសិរ្យសង្គ្រោះជាតិកម្ពុជាដោយមានការគាំទ្រពីរដ្ឋាភិបាលក្រុងហាណូយនៅថ្ងៃទី ៧ ខែ មករា ឆ្នាំ ១៩៧៩។ នេះក៏ជាថ្ងៃចាប់ផ្តើមនៃសង្គ្រាមស៊ីវិលរវាងរដ្ឋាភិបាលក្រុងភ្នំពេញ និងចលនាឧទ្ទាមខ្មែរក្រហមសហការជាមួយចលនាស្នេហាជាតិរបស់សម្តេចព្រះនរោត្តម សីហនុ និង លោកតា សឺន សាន ដើម្បីបណ្តេញកងទ័ពវៀតណាមប្រមាន៧ម៉ឺននាក់ដែលបន្តវត្តមានរបស់ខ្លួននៅកម្ពុជាឱ្យចេញអស់នៅឆ្នាំ១៩៨៩។ សង្គ្រាមស៊ីវិលនេះបានបណ្តាលឱ្យមនុស្សរាប់សែននាក់ទៀតស្លាប់ របួស ពិការ និងកំព្រាឪពុកម្តាយ។ ពលរដ្ឋខ្មែររាប់លាននាក់បានភៀសខ្លួនពីសង្គ្រាមទៅជ្រកកោនក្នុងជំរុំជនភៀសខ្លួនតាមព្រំដែនកម្ពុជា-ថៃ។ ថ្វីត្បិតមានការជ្រោមជ្រែងពីអង្គការសហប្រជាជាតិក៏ដោយជីវភាពរស់នៅក្នុងជំរុំជនភៀសខ្លួនពោរពេញទៅដោយទុក្ខវេទនាគ្រប់ជំពូក ដូចជា ការខ្វះខាតម្ហូបអាហារសម្បៀកបំពាក់ ថ្នាំសង្កូវ ចោរកម្ម សង្គ្រាម និងការធ្វើទុកបុកម្នេញពីពួកទាហានអមនុស្សធម៌របស់ប្រទេសសៀមជារៀងរាល់ថ្ងៃ។

ព្រឹត្តិការណ៍នយោបាយការទម្លាក់គ្រាប់បែកការប្រល័យពូជសាសន៍ សង្គ្រាមស៊ីវិល និងវិបត្តិមនុស្សធម៌ក្នុងជំរុំជនភៀសខ្លួននានាមិនត្រឹមតែធ្វើឱ្យមនុស្សរាប់លាននាក់ស្លាប់ពិការ និងកំព្រាឪពុកម្តាយប៉ុណ្ណោះទេ វាបាននិងកំពុងបន្សល់ទុកនូវផលវិបាកផ្នែកសុខភាពផ្លូវកាយ និងផ្លូវចិត្តដល់ប្រជាជនកម្ពុជារាប់លាននាក់ រួមទាំងពលរដ្ឋខ្មែរអាមេរិកាំងជាង១៣០.០០០នាក់មកដល់សព្វថ្ងៃនេះ។

**រូបទី២:** Cambodian American Report Dramatically Higher Rates (%) of PTSD, Depression, Hypertension, Diabetes, Stroke than the General Population

Sources: US data (age 18+) from CDC-BRFSS Survey

ពលរដ្ឋខ្មែរអាមេរិកាំងដែលសេសសល់ជីវិតពីរបបវាលពិឃាតមានសុខភាពលំបាកលំបិនខ្លាំងបើប្រៀបធៀបនឹងពលរដ្ឋអាមេរិកាំងទូទៅ(រូបទី២)។ សមាគមគាំទ្រសុខភាពខ្មែរបានស្ទង់មតិពលរដ្ឋខ្មែរអាមេរិកាំងដែលមានអាយុ៣៥ឡើង ដែលរស់នៅភាគខាងលិចនៃរដ្ឋម៉ាស្សាឈូសេត្ស និងរដ្ឋកានិកតិកិតចំនួន១៤០នាក់ ក្នុងឆ្នាំ២០១១។

អ្នកចូលរួម ៦៧% បានត្រូវប្រាប់ដោយគ្រូពេទ្យរបស់ខ្លួនថា មានជំងឺរន្ធត់ចិត្ត (PTSD), 65% មានជំងឺពិបាកចិត្ត (Depression), 40.7% មានជំងឺលើសឈាម (Hypertension), 27% មានជំងឺទឹកនោមផ្អែម(Diabetes) និង8%មានជំងឺដាច់សរសៃឈាមខួរក្បាល (Stroke)។

**រូបទី៣:** Cambodian Americans have more chronic disease at younger age than other Americans

ខ្មែរអាមេរិកាំងមានជំងឺរ៉ាំរ៉ៃច្រើនជាង និងក្នុងវ័យក្មេងជាងពលរដ្ឋអាមេរិកាំងឯទៀត។ ការសិក្សាក៏បានបង្ហាញថា ៥០% នៃអ្នកចូលរួមស្ទង់មតិមានជំងឺរ៉ាំរ៉ៃយ៉ាតិច ៥ មុខ (មើលរូបទី ៣)។

ថ្មីនេះៗក្រសួងការពារជាតិសហរដ្ឋអាមេរិកបានធ្វើការសិក្សាទៅលើអតីតៈយុទ្ធជនអាមេរិកាំងដែលត្រលប់មកពីសមរិភូមិវិញបានបញ្ជាក់ថា ជំងឺផ្លូវចិត្តនិងជំងឺផ្លូវកាយមានទំនាក់ទំនងគ្នាយ៉ាងជិតស្និត។ មានន័យថា ភាគច្រើននៃអ្នកមានជំងឺ ផ្លូវចិត្តមានជំងឺទឹកនោមផ្អែម។

លទ្ធផលការស្ទង់មតិរបស់សមាគមគាំទ្រសុខភាពខ្មែរបានបង្ហាញទៀតថា អ្នកចូលរួមស្ទង់មតិភាគច្រើន (៨៥%) បានជួបពិនិត្យសុខភាពជាមួយគ្រូពេទ្យគ្រួសាររបស់ខ្លួនយ៉ាងហោចណាស់មួយដងក្នុងមួយឆ្នាំ ប៉ុន្តែលទ្ធផលសុខភាពរបស់ពួកគាត់ពុំមានការជឿនលឿនឡើយ ៕ **តទៅលេខក្រោយ**

# AccuCare




## Homecare Agency

Group Adult Foster Care Program (GAFC)
MassHealth

ជាសេវាមានគុណភាពខ្ពស់ និងទុកចិត្តបាន
បុគ្គលិកមានសណ្ដានចិត្តល្អ និងធ្វើការតាមវិជ្ជាជីវៈ
អ្នកគ្រប់គ្រង និងបុគ្គលិកនិយាយភាសាខ្មែរ



*Compassionate Care & Reliable*
*Professional & Cultural Sensitive*
*Management & Staffs speak Khmer*

*កម្មវិធី Group Adult Foster Care (GAFC) គឺជាដំណោះស្រាយល្អបំផុតសំរាប់ចាស់ៗ ខ្មែរយើង ដែលមានប ញ្ហាវាំរ៉ៃផ្នែកសុខភាព ឬជរាហើយមិនចង់ ចាកចេញពីលំនៅដ្ឋានខ្លួនឯង ឬមិនចង់បែកពីក្រុមគ្រួសារដែលបានរស់នៅជាមួយគ្នាជាយូរមកហើយ ។ យើងអាចជួយអោយជីវិតលោកអ្នកកាន់តែប្រសើរឡើង តាមរយៈការផ្ដល់នូវសេវាថែទាំសុខភាពមួយទល់មួយដល់ផ្ទះលោកអ្នកតែម្ដង ។*

*Accucare Homecare Agency is the perfect solution for seniors and others who are not ready to leave their home for an institutional setting or live with reltives because of illness or chronic conditions. We improve your life by providing one-on-one compassionate senior care in the comfort of your own home.*

### ដើម្បីអាចចូលរួមក្នុងកម្មវិធីនេះបានលោកអ្នកត្រូវមានលក្ខណៈដូចខាងក្រោម :

*To be eligibled for GAFC you must:*

- *រស់នៅផ្ទះរដ្ឋ (live in subsidized or public housing)*
- *អាយុ ២២ ឆ្នាំឡើងទៅ (age 22 years and older)*
- *មាស់ប៉ៃហ៊ុលីស្ទង់ដា (eligible for Masshealth Standard)*
- *ត្រូវការជំនួយក្នុងការរស់នៅប្រចាំថ្ងៃយ៉ាងហោចណាស់មួយដូចជា មុជទឹក ស្លៀក-ពាក់ ពេលប្រើបន្ទប់ទឹក ចំអិនអាហារ ឬ ពេលដើរ (need daily assistance with one or more personal care tasks such as bathing, dressing, toileting, meal preparation and/or moving)*
- *មានការអនុញ្ញាតពីគ្រូពេទ្យផ្ទាល់ខ្លួនអ្នក (have physician statement of your condition)*
- *ត្រូវបានវាយតំលៃផ្នែកសុខភាព និងការអនុម័តយល់ព្រមពីកម្មវិធី (be screened and approved for the program )*

### ផលប្រយោជន៍ទទួលបាន :

*Benefits you will get:*

- *ការថែទាំផ្ទាល់ខ្លួនមួយទល់មួយក្នុងផ្ទះរបស់អ្នករាល់ថ្ងៃមួយថ្ងៃមួយម៉ោងលើការរស់នៅប្រចាំថ្ងៃ (personal care service in your home, up to one hour of service each day)*
- *ជំនួយលើការគ្រប់គ្រងថ្នាំសង្កូវអ្នក (Medication Managemant)*
- *ផែនការថែរទាំសុខភាពផ្ទាល់ខ្លួនមួយ ដែលធ្វើឡើងដោយគ្រូពេទ្យ និងខេសមានីជើ (an individual care plan developed by a registered nurse and case manager)*
- *វាយតំលៃលើសេចក្ដីត្រូវការជាប្រចាំជាបន្តបន្ទាប់ (ongoing monitoring of needs)*
- *សមាជិកអាចទាក់ទងមក ២៤ម៉ោង (24-hour access to services)*

**ត្រូវការជ្រើសរើសបុគ្គលិកធ្វើការ PCA/ HHA needed for Lowell, Lynn, Revere, and Boston**

ដើម្បីចុះឈ្មោះសូមទាក់ទងមក
To register, please contact:



អ៊ុក តុលាយុទ្ធ ឡូវែល
Tolayuth Ok: Lowell
Tel: (978)735-4955, Fax: (978) 735-4956
Office: 144 Merrimack St., Suite 404, Lowell, MA 01852



ពិន ឆាវ៉ាន់ លីន រីវៀរ បូស្តុន
Chhavan Pin: Lynn, Revere, Boston
Tel:(617)783-7177, Fax: (617) 783-7188
Office: 214 Lincoln St., Suite 200, Allston, MA 02134

"នាងប្រាប់ខ្ញុំគ្រប់យ៉ាង

# ខ្ញុំសប្បាយចិត្តខ្លាំងណាស់។

នាងពេញចិត្តនៅផ្ទះជាមួយយើង។"





CAREGIVER™
HOMES

Caregiver Homes™ ជួយចាស់ជរា និងជនពិការឱ្យរីករាយជាមួយ នឹងគុណភាពខ្ពស់នៃជីវិតនៅផ្ទះ

- បង់ប្រាក់ & បង្រៀបណ្ដុះបណ្ដាល អ្នកថែទាំពេញពេលដែលរស់នៅជាមួយ
- ផ្ដល់ជំនួយ ប្រកបដោយវិជ្ជាជីវៈ ពីគិលានុបដ្ឋាយិកា និង អ្នកថែទាំ ដែលចេះយកចិត្តទុកដាក់
- ជួយអ្នកស្វែងរក & ទទួលបានគ្រប់សេវាដែលចាំបាច់

សម្រាប់ព័ត៌មានបន្ថែម សូមទំនាក់ទំនង **866.797.2333** ឬចូលមកគេហ៍ទំព័ររបស់យើង។

**WWW.CAREGIVERHOMES.COM**

# ប្រើធនាគារឲ្យប្រសើរ គឺនៅក្នុងកាបូប

FREE



$150 gift card to Coach*

## កាតរង្វាន់$150ទិញកាបូបល្បីឈ្មោះ"ខូច"

## ជាមួយការបើកសេវាសម្រាប់ប្រើធនាគាររាល់ថ្ងៃ




washingtonsavings.com

* Restrictions apply
Ask for details.



Customer will receive a free gift within 30 days after redeeming a "FREE GIFT Certificate" and implementing the following combination of new services after 12/10/2012: A monthly direct deposit of at least $1,000 from an unaffiliated third party, at least one monthly automatic withdrawal that is not web or card based and an active debit card with 12 or more completed purchases is eligible for a $150 Coach® gift certificate. Promotion ends 06/30/2013. Coach® is a trademark of Coach, Inc. The program is not endorsed by Coach, Inc. nor is there any actual or implied joint venture, partnership or relationship of any kind between Washington Savings Bank and Coach, Inc. Promotions cannot be combined, one gift per customer, per account, per household. Available to personal accounts only. Fee of $150 applies for account closure or change of services within 6 months of free gift receipt. Washington Savings Bank reserves the right to disqualify any account/ person from this promotion if, in its sole discretion, it determines the account and/or services are solely designed to qualify for the free gift. Limited time offer, while supplies last.